# KhmerPost USA

សុបិន : (267) 253-3947, សែម : (781) 244-0522


**មាតិការឿង** **ទំព័រ**




VOL. 06 ISSUE 104 April.06th - 19th, 2012


# តើស្រុកទេសខ្មែរក្នុងឆ្នាំថ្មី "ឆ្នាំរោងនេះ" មានទំនាយយ៉ាងណាដែរ



លោក អ៊ឹម បូរិន្ទ




▸ នៅក្នុងមហាសង្ក្រាន្តឆ្នាំរោងឆ្នាំនាគរាជ របស់គណៈកម្មាធិការស្រាវជ្រាវហោរាសាស្ត្រ និង ប្រពៃណីទំនៀមទម្លាប់ខ្មែរនៃក្រសួងធម្មការ និង កិច្ចការសាសនាដែលរៀបរៀង និងគណនាដោយ លោក អ៊ឹម បូរិន្ទ មហាសង្ក្រាន្តឆ្នាំថ្មីនឹងចូលមក ដល់ចំថ្ងៃសុក្រ ៧រោជ ខែចេត្រត្រូវនឹងទី១៣ ខែ មេសាព.ស២៥៥៦ វេលាម៉ោង១៩ និង១១នាទី ល្ងាច ។ ចំណែកទេព្តាឆ្នាំថ្មីដែលនឹងមកទទួលតំណែង រក្សាសត្វលោកនាឋានកណ្តាលយើងនេះ គឺជារាជ បុត្រីទី៦

**តទៅទំព័រទី ០៧**

# ហ្វីឡាដែលហ្វៀនឹងអង្គការសមាគមខ្មែរ





**ដោយ : អ៊ុំ លឿម**

●●●សមាគមបំរើគ្រួសារខ្មែរថ្មី មួយទើបនឹងចាប់កំណើតនៅហ្វីឡាដែល ហ្វៀដែលជាទីក្រុងចំណាស់ដ៏តូចចង្អៀត មួយដែលចំរុះទៅដោយពហុជាតិសាសន៍ ដ៏ណែនណានតាន់តាប់ ហើយជាទីក្រុងដែល ជិតដាមដោយរឿងអាស្រូវនានាជាច្រើន ព្រោះដោយសារទីក្រុងនេះ ជាជម្រកផ្តុំ ដោយជនអន្ធពាលខុសច្បាប់ផងដែរ ។

ក្នុងចំណោមទីក្រុងធំៗទាំងអស់ដែល មានប្រជាជនខ្មែរកំពុងរស់នៅ ហ្វីឡាដែល ហ្វៀបានក្លាយជាទីក្រុងលំដាប់ទីបី ដែល មានខ្មែររស់នៅច្រើនជាងគេ បន្ទាប់ពីទីក្រុង

**តទៅទំព័រទី ០៤**

# The KP Press Club

## Presents the 2nd Annual

## Media & Community Building Gathering

Sponsored by

**KhmerPost USA**
Printing The Cambodian World News

## សេចក្ដីអញ្ជើញ

***ដល់បងប្អូនខ្មែរ មានថ្នាក់ដឹកនាំ អ្នកប្រកបរបរពាណិជ្ជកម្ម ឬអ្នកផ្ដល់សេវាកម្មនានា ដែលរស់នៅ ម៉ាសាឈូសែត រ៉ូដអាយឡិន ញូហាមស្ពី និងកុណិចទិកិត***

សូមអញ្ជើញមកចូលរួមក្នុងកម្មវិធី"ប្រេសក្លឹបពិសេស" សំរាប់បងប្អូនក្នុងតំបន់ បញ្ចេញសម្លេង បង្កើតទំនាក់ទំនង តាម"ណេតវើក"ដ៏សំខាន់ ដែលខ្មែរប៉ុស្តិ៍ស.រ.អា ខិតខំកសាងជូនសហគមន៍ខ្មែរ តាំងពីជាង៥ឆ្នាំមកហើយ ។

អាចនឹងជួយបង្កើនទំនាក់ទំនងពាណិជ្ជកម្ម ឬជួបអ្នកនយោបាយក្ដី ក្នុងឱកាសកាសល្ងៀងសាយភោជដ៏ឈ្ងុយឆ្ងាញ់ នៅភោជនីយដ្ឋានដ៏ធំល្អមួយរបស់ជនជាតិអាស៊ី លោកអ្នកនឹងចូលរួមសកម្មភាពព័តិមានរបៀបថ្មីមួយ ដែលជនជាតិអាស៊ីយើង ពុំដែលបានធ្វើពីមុនមកនៅក្នុងតំបន់នៅឡើយទេ ។

សូមលោកអ្នកអញ្ជើញចូលរួម ក្នុងឱកាសដ៏កម្រនៃ"ប្រេសក្លឹបនេះ" បើកជូនលោកអ្នក-ជាពិសេស សំរាប់តំបន់កុំបីអាក់ខានឡើយ ។

យើងបានជ្រើសយកភោជនីយដ្ឋានដ៏ធំបង្អស់មួយនៅផ្លូវជាតិខ្វែង៩៣និង៩៥ ហើយទទួលលោកអ្នកជាមួយម្ហូបប្រណិត៨មុខ ចំអិនដោយចុងភៅជាតិចិនដ៏ឆ្នើម ដើម្បីបណ្ដែតអារម្មណ៍ជាមួយគ្នាក្នុងបរិយាកាសនៃអធិរាជក្រុងចិនបូរាណផង ។ **សូមអរគុណ ពិន សំខុន**



**Date:** Friday, May 4th, 2012
**Time:** 5:30 – 9:30 p.m.
**Place:** New China Pearl Restaurant, 288 Mishawum Road. Woburn, MA.
**Cost:** $35 per attendance

Calling for all the Cambodian Commu-nity members/leaders, professionals, business owners, and service providers of Massa-chusetts, Rhode Island, New Hampshire and Connecticut to join our Exclusive Press Club event to meet and greet to build your network and to give voice for your community through KhmerPost USA newspaper and other local media outlets. Eight Courses of Meal will be served, Presentations. Q and A session, Open forum, and Social Networking. Please make your RSVP today!

### Impact of the KhmerPost USA



Roger Samkhon Pin, Publisher & Editor-in-Chief

The KhmerPost USA is the only Cambodian newspaper that has the highest circulation and is most read in the Cambodian communities in the East Coast of United States. It provides important news and information to a market that is often isolated from the larger community due to a language barrier. This includes not only national and international news but practical local information concerning health, education, politics, businesses and community involvement.

Found in 2007 by a respectable Cambodian Journalist, Roger Samkhon Pin, who is the former President of Cambodian Journalist Association of Cambodia, the former Director of Radio Free Asia, Cambodian Services in Washington D.C, and the former owner and broadcaster of Cambodian-American news through five Radio Stations around the U.S. He is very well respected as an independent journalist around the country and the world by the Cambodian people. Consequently, the KhmerPost USA newspaper was quickly spread readerships upon its inception in Philadelphia and we built a branch to serve the New England States to meet the demands.

- **Publication Frequency:** 24 times a year. Prints on every other Friday
- **Circulations:** 20,000 copies per month for FREE.
- **Distributions:** nearly 300 locations in Philadelphia, New Jersey, Rhode Island, and Massachusetts.
- **Readership:** 50,000+ and is growing to New York & Connecticut in summer 2012.

**Advertising Department**
**KhmerPost USA, LLC**
Headquarter. 438 Lindley Avenue. Philadelphia, PA 19120
Direct: 267-253-3947 Phone/Fax: 215-722-2226
Email: KhmerPostUSA@gmail.com
**Website: www.khmerpost.us**

**RSVP : 267-253-3947/KhmerPostUSA@gmail.com**



# សួស្តីឆ្នាំថ្មី



## Happy Khmer New Year
## Year of the Dragon B.E. 2556

ទំនាយស្រុកទេស

April
13
14
15
2012



## Food, Fun, Dance & Capital Campaign !

ក្រុមរបាំអង្គរ




## All Day Event













Location: Between JJ Boomer & Elks Club (Pawtucket Blvd) www.ckbm.org
For Info, Call Maya 978.501.0106 Sambath Soum 978.729.5566, Sam Meas 781.696.1324









ក្រុមរបាំអង្គរ
Angkor Dance Troupe, Inc.






តមកពីទំព័រទី ១

# ហ្វីឡាដែលហ្វៀ នឹងអង្គការ...

ឡូវែលនៃរដ្ឋម៉ាហ្សាឈូសេតនឹងទីមួយ គឺទីក្រុងឡុងប៊ិចរបស់រដ្ឋកាលីហ្វ័រញ៉ា ។ តាមតួលេខក្រៅផ្លូវការបានឱ្យដឹងថាខ្មែរ៧០%នៃពលរដ្ឋខ្មែរក្នុងសហគមន៍នេះ គឺជាអតីតជាជនភៀសខ្លួនមកពីជំរុំនានានៅតាមព្រំដែនខ្មែរ-សៀម។ ដោយហេតុនេះហើយទើបញ៉ាំងឱ្យគ្រួសារខ្មែរក្នុងសហគមន៍មួយនេះ មានការយល់ដឹងក្នុងកំរិតមួយដែលស្ថិតនៅខ្វះចន្លោះនៅឡើយ ទើបជាហេតុបណ្តាលឱ្យគ្រួសារខ្មែរមួយចំនួនកើតមានវិប្បត្តិគ្រួសារដោយប្រការផ្សេងៗជាហូរហែរ...។

ចំពោះការឃ្លាតឆ្ងាយពីគ្នារវាងអាណាព្យាបាលជាមួយនឹងបុត្រធីតាក៏ជាដើមចមនៃបញ្ហា ។ ការប្រព្រឹត្តនូវអំពើអបាយមុខផ្សេងៗ (ល្បែង ស្រា...) ក៏ជាប្រភពនៃសភាវៈអាក្រក់ក្នុងគ្រួសារអ៊ីចឹងហើយ ទើបធ្វើឱ្យសហគមន៍ខ្មែរនៅហ្វីឡាដែលហ្វៀ មានមុខមាត់ក្នុងបរិមាណដ៏តិចតួចស្តួចស្តើង ដែលយើងទាំងអស់គ្នាទទួលយកពុំបាន។ រីឯបញ្ហាសោភ័ណ្ឌភាព ឬសម្រស់ទីក្រុង ក៏ជាប្រការមួយដែលសំខាន់បំផុតសម្រាប់ប្រទេសជាតិមួយដែលមានអារ្យធម៌ល្អខ្ពង់ខ្ពស់ និងជាប្រទេសដ៏ទំនើបមួយក្នុងលោក ក៏ប៉ុន្តែសម្រាប់សហគមន៍ខ្មែរមួយនេះ សោភ័ណ្ឌភាព និងសម្រស់នៃទីក្រុងក្នុងសហគមន៍ហាក់ស្ថិតនៅឆ្ងាយសែនឆ្ងាយខុសពីអ្វីដែលគេធ្លាប់បានគិតស្រម៉ៃ មានន័យថា "**គគ្រេចស្មោគគ្រោគ**" ។

ក៏ប៉ុន្តែផ្ទុយទៅវិញ សហគមន៍ខ្មែរនាទីក្រុងហ្វី-ឡាដែលហ្វៀ ក៏ជាទីក្រុងមួយដែលល្បីល្បាញដល់បណ្តារដ្ឋ និងដល់បណ្តាប្រទេសនានា ដែលមានពលរដ្ឋខ្មែររស់នៅផងដែរ ព្រោះដោយសារតែហ្វីឡាដែលហ្វៀពោរពេញទៅដោយអ្នកសង្គម និងអ្នកនយោ-បាយជាច្រើនបក្សជាច្រើនក្រុម និងមានសម្បូរណ៍ដោយអង្គការសមាគមនានាច្រើន ។ ប៉ុន្តែទោះជាយ៉ាងនេះក្តី ស្ថានភាពសេដ្ឋកិច្ចគ្រួសារ និងភាពរីកចំរើនរបស់ពលរដ្ឋខ្មែរ បោះជំហានទោមុខដ៏យឺតបំផុត។

បើនិយាយពីសមាគមវិញ ហ្វីឡាដែលហ្វៀត្រូវបានក្រឡេកមើលឃើញថា ជាទីក្រុងមួយដែលពូនផ្តុំដោយអង្គការសមាគមជាច្រើន ដូចបានរៀបរាប់ពីខាងលើស្រាប់ ក៏ប៉ុន្តែសម្រាប់រាល់អង្គការសមាគមមួយចំនួនត្រូវបានចាប់បដិសន្ធិតែមួយដង្ហើមចង្រិតប៉ុណ្ណោះ ក៏រលត់ទៅវិញ ព្រោះបញ្ហាក្ស័យធន់ និងគ្មានមូនិធិគ្រប់គ្រាន់សម្រាប់ដំណើរការ ឧទាហរណ៍ដូចជា "សមាគមចាស់ព្រឹទ្ធាចារ្យខ្មែរ-អាមេរិកកាំង"ជាដើម។ ប៉ុន្តែប្រការដែលគួរឱ្យកត់សំគាល់សម្រាប់ "សមាគមខ្មែរ" ប្រចាំទីក្រុងហ្វីឡាដែលហ្វៀ ហាក់មានលំនឹងជាងគេទាំងអស់នៅក្នុងចំណោមអង្គការសមាគមនានា ទោះបីជាសមាគមខ្មែរត្រូវបានកាត់បន្ថយជំនួយពីម្ចាស់ជំនួយមួយចំនួនយ៉ាងណាក៏ដោយចុះ ។

ដើម្បីស្តារមុខមាត់ថ្មី ដើម្បីឱ្យសហគមន៍ខ្មែរហ្វីឡាដែលហ្វៀធ្វើដំណើរលើវិថីមួយឆ្ពោះទៅកាន់ភាពរីកចំរើន និងស្តារកេរ្តិ៍ឈ្មោះល្អ ទើសមាគមថ្មីមួយទៀតត្រូវបានបង្កើតឡើងកាលពីពេលថ្មីៗនេះ។ "សមាគមគាំទ្រគ្រួសារខ្មែរ" ជាសមាគមថ្មីមួយទៀត ដែលទើបតែបង្កើតនាពេលថ្មីៗនេះ ហើយ "សមាគមគាំទ្រគ្រួសារខ្មែរ" ក៏បានអះអាងពីការជួយលើកស្ទួយ និងជួយទប់ស្កាត់រាល់បញ្ហានិងរាល់រឿងរ៉ាវអាស្រូវនានាដែលធ្លាប់បានកើតឡើង លើគ្រួសារខ្មែរនាពេលកន្លងមក ។

នាព្រឹកថ្ងៃសុក្រ ទី២៤ ខែមិនា កន្លងមកនេះ "សមាគមគាំទ្រគ្រួសារខ្មែរ" បានប្រារព្ធធ្វើពិធី "បុណ្យផ្កាប្រាក់សាមគ្គី" ជាសាធារណៈមួយនៅវត្ត "ព្រះពុទ្ធរង្សី" នាទីក្រុងហ្វីឡាដែលហ្វៀខាងត្បូងក្នុងគោលបំណងប្រមូលថវិកាមួយចំនួន សម្រាប់ដំណើរការលើសមាគមដ៏ក្មេងខ្ចីរបស់ខ្លួន ឱ្យមានចរន្តទៅមុខ។

ថ្លែងទៅកាន់ព្រះសង្ឃ និងអ្នកចូលរួមស្តាប់ក្នុងសារដ៏ធំទូលាយនៃវត្ត "ព្រះពុទ្ធរង្សី" អ្នកស្រី ចាប ស៊ីម៉ន នាយិកាប្រធានសមគមគាំទ្រគ្រួសារខ្មែរបានមានប្រសាសន៍ថា : គោលបំណងចម្បងក្នុងការបង្កើតសមាគមនេះឡើង គឺដើម្បីចង់ផ្លាស់ប្តូរក្នុងចរន្តសង្គមនាពេលបច្ចុប្បន្ន។ អ្នកស្រីបន្តថា : ក្រុមការងាររបស់អ្នកស្រី





បានបូជាកម្លាំងកាយ កម្លាំងចិត្ត ព្រមទាំងថវិកាផ្ទាល់ខ្លួនមួយចំនួន ដើម្បីបង្កើតសមាគមនេះជាប្រយោជន៍ក្នុងការជួយរំសាយកង្វល់គ្រួសារខ្មែរ ដែលមានចំណងយ៉ាងតឹងក្នុងបន្ទុកគ្រួសារនាពេលបច្ចុប្បន្ន ។ អ្នកស្រី ស៊ីម៉ន ក៏បានអំពាវនាវឱ្យមានការជួយជ្រោមជ្រែងពីសំណាក់ខ្មែរគ្រប់មជ្ឈដ្ឋានទាំងអស់ ដើម្បីប្រយោជន៍ដល់គ្រួសារខ្មែរទាំងអស់...។

ស្ថាបនិករបស់ "សមាគមគាំទ្រគ្រួសារខ្មែរ" និងជាអគ្គនិពន្ធនាយកការសែត "ខ្មែរផុស" គឺលោក ពិន សំខុន ក៏បានពន្យល់អំពីគោលបំណងនៃការបង្កើតសមាគមនេះឡើង។ លោក សំខុន មានប្រសាសន៍ថា: សមាគមនេះបង្កើតឡើងសម្រាប់ជួយដល់គ្រួសារខ្មែរជាចម្បង ហើយចង់កែប្រែពីទម្លាប់ដែលបងប្អូនខ្មែរមានពីមុនឱ្យទៅជាទម្លាប់ថ្មីមួយវិញ ដែលជាទម្លាប់ល្អហើយញ៉ាំងឱ្យគ្រួសារខ្មែរបោះជំហានទៅកាន់ភាពល្អូតលាស់មួយបាន...។ លោក សំខុន បានលើកហេតុផលនឹងលើកជាឧទាហរណ៍ដល់អ្នកចូលរួមស្តាប់ថា "មានគ្រួសារខ្មែរខ្លះប្រដៅកូនចៅរបស់ខ្លួនឱ្យប្រព្រឹត្តនូវអំពើល្អ ប៉ុន្តែខ្លួនឯងដែលជាអាណាព្យាបាលបែរជាឱ្យគំរូជាក់ស្តែងមិនល្អដល់កូនចៅទៅវិញ ទាំងអស់នេះតើឱ្យកូនៗស្តាប់យ៉ាងម្តេចនឹងកើត" ។

ចំណែកអ្នកស្រី សុបិន ពិន សមាជិការសកម្មរបស់សមាគមនេះ ក៏បានផ្តល់នូវអនុសាសន៍ល្អៗ មួយចំនួនទាក់ទងទៅនឹងអ្វីដែលជាសមាគមរបស់អ្នកស្រីបាននឹងកំពុងធ្វើ ។ អ្នកស្រី សុបិន បានថ្លែងថា "សមាគមគាំទ្រគ្រួសារ" មានគោលការជួយដោះស្រាយនូវរាល់បញ្ហាធំៗទាំងឡាយណាដែលអង្គការ ឬសមាគមនានាពុំទាន់មានលទ្ធិភាពអាចដោះស្រាយបាននូវឡើយ ដូចជាករណីកូនខ្មែរជាប់ពន្ធនាគារដោយគ្មានកំហុស ព្រោះ



ដោយសារការដើរជាមួយក្រុមអន្ធពាលឃាតករ ឬក្រុមមនុស្សខូចមួយនចំនួនទៀតដែលជាមិត្តភ័ក្តិរបស់ខ្លួន ក្នុងខណៈដែលខ្លួនឯងពុំបានប្រព្រឹត្តអ្វីខុសនឹងច្បាប់នោះ...។

តាមការបញ្ជាក់ពីសំណាក់អ្នកស្រី សុបិន បានឱ្យដឹងថា "ទីស្នាក់ការបណ្តោះអាសន្នរបស់អង្គការគាំទ្រគ្រួសារខ្មែរ" គឺស្ថិតនៅក្នុងវត្ត "ព្រះពុទ្ធរង្សី" តែម្តង។ ការផ្លាស់ប្តូរយកទីតាំងថ្មីជាអចិន្ត្រៃយ៍ គឺអាចប្រព្រឹត្តទៅបានលុះត្រាតែដំរាបណាសមាគមមួយនេះមានធន់ធានសមល្មម។

លោក ផល ឈឿន ជាគណកម្មការរបស់សមាគមនេះ ក៏បានលើកជាយោបល់រួមថា : សមាគមរបស់ពួកលោកគឺជួយដល់គ្រួសារខ្មែរ ដែលមានបញ្ហាទូទៅ ហើយជាពិសេស គឺចង់ជួយកុំឱ្យគ្រួសារខ្មែរកើតមានបញ្ហាតែម្តង ។ រីឯកិច្ចការសរសេរក្រដាសស្នាមដើម្បីសុំលុយសង្គមកិច្ច ឬសុំលុយរដ្ឋាភិបាលនោះក៏ជាភារៈកិច្ចរបស់ "សមាគមគាំទ្រគ្រួសារខ្មែរ" ដែរ ។

តាមការសង្កេតជាក់ស្តែងទូទៅឃើញថា សមាគមថ្មីមួយនេះហាក់មានគោលការណ៍ និងទិសដៅរបស់ខ្លួនប្រហាក់ប្រហែលទៅនឹងអ្វីដែលសមាគមខ្មែរប្រចាំទីក្រុងហ្វីឡាដែលហ្វៀកំពុងធ្វើនាពេលបច្ចុប្បន្នដែរ ។ និយាយរួមសមាគមខ្មែរទាំងពីរ(ទាំងចាស់នឹងថ្មី) កំពុងធ្វើសំណើរលើផ្លូវពីរផ្សេងៗគ្នា តែក្នុងទិសដៅតែមួយគឺ "ជួយលើកស្ទួយនិងជួយដល់សង្គមខ្មែរ" ។ ក៏ប៉ុន្តែទោះជាយ៉ាងក្តីគេនៅពុំទាន់អាចដឹងបានថា តើសមាគមថ្មីមួយនេះ អាចធ្វើដំណើរទៅមុខដោយរលូនឬមួយយ៉ាងណានោះឡើយ?។ យ៉ាងណាមិញក្នុងនាមសហការី និងជាស្នេហរបស់កាសែត "ខ្មែរផុស" យើងចូលរួមគាំទ្រដល់សមាគមថ្មីមួយនេះប្រយោជន៍លើកស្ទួយដល់សហគមខ្មែរនាទីក្រុងហ្វីឡាដែលហ្វៀនេះ ដែលធ្លាប់បានញាំញី និងជិតដាមដោយរឿងអាស្រូវជាច្រើនអន្លើយ ។

ទាក់ទិនទៅនឹងការចាប់បដិសន្ធិដ៏ថ្មីថ្មោងរបស់សមាគមនេះ "ខ្មែរផុស" បានព្យាយាមទាក់ទងទៅសមាគមខ្មែរ ប្រចាំទីក្រុងហ្វីឡាដែលហ្វៀ ដើម្បីសុំការបកស្រាយអំពីមតិ និងប្រតិកម្មផ្សេងៗជុំវិញការបង្កើតសមាគមថ្មី នេះ ។ អ្នកស្រី ស៊ីនឌី ស៊ុយ Director of operation បានបំភ្លឺដល់ "ខ្មែរផុស" ក្នុងខណៈ ដែលប្រធានថ្មីរបស់សមាគមគឺអ្នកស្រី ចាន់ថា ឈុំ ពុំ មានវត្តមាននៅការិយាល័យថា : ក្នុងនាមអ្នកស្រីផ្ទាល់ពុំមានជាការទាស់ខុសអ្វីទេ ក្នុងការបង្កើតសមាគមថ្មីមួយនោះ ព្រោះកាលណាមានសមាគមតែមួយម្នាក់ឯងក៏ពុំអាចជួយដល់កិច្ចការនានាឱ្យគ្រប់ទាំងអស់បានឡើយ ដូច្នេះវាក៏កាន់តែប្រសើរដែរ ក្នុងការជួយដល់សង្គមខ្មែរយើង...។ ឆ្លើយតបនឹងសំណួរដែល "ខ្មែរផុស"



សួរថា តើអាចប៉ះពាល់ដល់ប្រាក់ជំនួយ (Fund) របស់សមាគមអ្នកស្រីដែរ ឬទេ ក្នុងខណៈដែលសេដ្ឋកិច្ចសហរដ្ឋអាមេរិកកំពុងធ្លាក់ចុះ ហើយមានសមាគមថ្មីកើតទៀតនោះ។ អ្នកស្រីស៊ីន ឌី បានបំភ្លឺថា វាប្រាកដជាពុំមានប៉ះពាល់អ្វីឡើយ ព្រោះអ្វីៗទាំងអស់ គឺអាស្រ័យ

KHMER POST USA, LLC
East Coast Publication

Pin Samkhon,
Publisher & Editor-in-Chief
Email: pinsamkhon@gmail.com
Staff Writers: Loeum Im

Contributed Writers:
Mam Yin, Kim Phien
Advertising Department

Soben Pin
KhmerPostUSA@gmail.com
267-253-3947

Sam Khoeun
Sales Consultant
(781) 244-0522

Design Staffs:
Leang Heng & Mong Meng

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English.
It published twice a month in Pennsylvanian & Massachusett.

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year.
Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

ទៅលើសំណើរសុំ(Proposal) ដែលយើងសរសេរទៅកាន់ម្ចាស់ជំនួយ ។ ម្ចាស់ជំនួយគេមើលថា តើសំណើររបស់យើងហ្នឹងត្រូវចំលើគោលការណ៍ដែលបានសរសេរដែរឬអត់?។ ដូច្នេះវាគ្មានប៉ះពាល់អ្វីដល់សមាគមខ្មែរយើងឡើយ...។

ប៉ុន្តែក្នុងគ្រាដំណាលគ្នានោះ អ្នកស្រី ស៊ីនឌី ក៏បានទទួលស្គាល់ផងដែរថា បច្ចុប្បន្នសមាគមខ្មែរពិតជាមាការពិបាកក្នុងរឿងរកប្រាក់ជំនួយ(Fund)បន្តិច ព្រោះដោយសារបញ្ហាសេដ្ឋកិច្ច ដែលជាហេតុធ្វើឱ្យប៉ះពាល់យ៉ាងដំណំ ដែលបណ្តាលឱ្យសមាគមជាច្រើនដែលក្នុងនោះរួមមានសមាគមខ្មែរ ចិន យួន អាមេរិកាំង ។ល។

ចំពោះសមាជិកគាំទ្រសមាគមខ្មែរប្រចាំទីក្រុងហ្វីដែលហ្វៀ ត្រូវបានអ្នកស្រី ស៊ីន ឌី បង្ហើបឱ្យដឹងថា "នៅខាង North ហ្វីឡាមានចំនួនអ្នកគាំទ្រសមាគមខ្មែរច្រើនគួរសមដែរ ព្រោះនៅជិតការិយាល័យរបស់សមាគម តែនៅខាង South ហ្វីឡាវិញ ពុំសូវមានទេ ព្រោះនៅឆ្ងាយ តែសម្រាប់នៅ South West ហ្វីឡាវិញកាន់តែយ៉ាប់តែម្តង..."៕

**300+ Cars a week**

# បើកកម្មវិធីដេញថ្លៃឡានជាសាធារណៈ:



**INTERSTATE Auto Auction** Auctioncar.net **(603) 893-7777**

## In Salem, NH-Just 20 Minutes from Lowell MA

**OPEN TO THE PUBLIC LIVE CAR AUCTION Saturdays 10AM**

***Test Starts/Preview! Starts at 9AM***

# Wednesdays 5:30PM

***Free Test Drives Before You Buy!***

**Starts Wednesday at 9AM-5PM**

Only 40 Minutes From Lynn and Revere, MA
Just Over 1 Hour from Providence, RI
Or You Can Even Bid Online From Philadelphia, PA or New Jersey and Have The Car Delivered to Your Home"

**www.interstateautoauction.com**

**NH Lic#Auctioneer Alan Chambers/20 Hampshire Road - Salem NH 03079**


2004 Acura TL Leather, Sunroof! Low Miles! Super Clean $8,999


2005 Honda Pilot EX-L! 4x4 Just 93,000 Miles, EX-L Leather 3rd Row 4x4 $11,999


2003 Ford Mustang Mach 1 V8 32V 4.6liter! Special Mach 1! Leather! $9950 only 83,000 Miles


2007 Lincoln MKZ All Wheel Drive, $14,800 All Wheel Drive Loaded! Great Condition


2002 GMC Sierra 1500 Extended Cab


2008 Dodge Grand Caravan Passenger $9,000 Low Miles! Drives Fantastic

-ឥតមានកក់លុយ សម្រាប់ដេញថ្លៃនៅក្នុង Online ឬទៅកន្លែងទេ -មានឡាន៣០០ ក្នុងមួយសប្តាហ៍
-Interstate Auto Auction, Salem NH ដែលនៅចម្ងាយ២០នាទីពីក្រុងឡូវែល អ្នកណាក៏អាចចូលរួមបានដែរ !
-**នៅថ្ងៃសៅរ៍ ម៉ោង១០:០០ព្រឹក** លោកអ្នកអាចបញ្ឆេះឡាន/ការសម្តែងឡានមុនម៉ោង៩ព្រឹក
-**ថ្ងៃពុធនៅវេលាម៉ោង៥:៣០នាទីល្ងាច :** លោកអ្នកអាចបើកឡានសាកល្បងពីរម៉ោង៩ព្រឹកដល់ម៉ោង៥ល្ងាច

# ចូលឆ្នាំរោងនឹងមកដល់ នៅថ្ងៃ១៣ មេសា ២០១២



**ដោយ : ពិន សំខុន**

ថ្ងៃដែលប្រជាពលរដ្ឋខ្មែររង់ចាំជាងគេ ក្នុងរយៈពេលមួយឆ្នាំកន្លងទៅ គឺថ្ងៃចូលឆ្នាំខ្មែរដែលនឹងមកដល់នៅសប្តាហ៍ខាងមុខនេះ ។ គឺជាទំនៀមទំលាប់នៃប្រទេសអាស៊ីអាគ្នេយ៍ចំនួនបួន គឺ ខ្មែរ-ថៃ-ឡាវ-នឹងភូមា ដែលនិយមព្រះពុទ្ធសាសនាថេរវាទ ហើយប្រារព្ធពិធីបុណ្យចូលឆ្នាំនេះជាមួយគ្នាដោយគេជឿថា ថ្ងៃនោះជាថ្ងៃមានរាសីខ្ពស់ដែលព្រះឥន្ទ្រាធិរាជយាងហោះ៧ជុំពិភពលោក ហែរហមដោយបុត្រី៧រូប ហើយត្រឡប់ទៅភ្នំព្រះសុមេរុវិញ ។

**ជំនឿជាទម្លាប់ :** ប្រទេសកម្ពុជាធ្លាប់ជាប្រទេសមានជំនឿលើព្រហ្មញ្ញសាសនា តាំងពីសម័យមហានគរ ។ សាសនានេះបានប្តូរជាសាសនាព្រះពុទ្ធ តែក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ តែប៉ុណ្ណោះ ហើយក៏ត្រឡប់មកព្រហ្មញ្ញសាសនាវិញ ។ មកដល់សម័យនេះ គេមានជំនឿថា នៅថ្ងៃទី១៣មេសា នៅពេលព្រះឥន្ទ្រដែលហោះប្រទក្សិណប្រោសព្រំពិភពលោកនោះ ព្រះឥន្ទ្រមានតែ ព្រះកេស (ក្បាល) មុខបួនដាក់លើជើងពានមាស ពុំមែនទៅដងខ្លួនទាំងមូលនោះទេ ខុសគ្នាពីប្រទេសភូមា ដែលព្រះព្រហ្មហោះប្រទក្សិណដែរ តែទៅទាំងរូបរាងកាយទាំងមូលមានដៃ៨ផង ។ តើហេតុអ្វី?

**រឿងនិទាន :** មានមាណពម្នាក់ចេះភាសាសត្វ ហើយជាកន្សែសារពេជ្រផង (ជាអ្នកដែលនឹងក្លាយទៅជាព្រះពុទ្ធ) ។ ព្រះព្រហ្មនៅពេលដឹងដំណឹងនេះក៏ចង់ផ្ចាញ់ ហើយហោះមកជួបមាណពនៅភូមិរបស់ខ្លួន មាណពភ័យរន្ធត់រកកលនឹងសន្លប់ តែព្រះព្រហ្មរំលឹកថា ព្រះអង្គមកនេះ ចង់តាំងសំនួរប្រាជ្ញាមួយចំនួនដល់មាណព ដែលល្បីថា ចេះនិយាយភាសាសត្វតែប៉ុណ្ណោះ -មាណពក៏ទទួល តែមុននឹងសួរ ព្រះព្រហ្មបានកំណត់ឱ្យមាណពដឹងថា សំនួរនេះ គឺជាការភ្នាល់ប្រាជ្ញា បើមាណពឆ្លើយរួច ហើយត្រូវ កបិលមហាព្រហ្មជាអ្នកចាញ់ ហើយព្រះអង្គនឹងកាត់ព្រះកេសព្រះអង្គ តែបើមាណពឆ្លើយមិនត្រូវវិញ នឹងត្រូវព្រះអង្គជាអ្នកកាត់ក្បាលមាណពនោះ -មិនទាន់នឹងទទួលយល់ព្រមផង ព្រះព្រហ្មក៏សួរមាណពនោះថា "ម្នាលមាណពសូមអ្នកឆ្លើយនឹងសំនួរយើង តើពេលព្រឹករាសីស្ថិតនៅត្រង់ណា ? ពេលថ្ងៃត្រង់នៅត្រង់ណា?-ពេលល្ងាច តើរាសីនោះនៅត្រង់ណា? ថ្ងៃស្អែក យើងនឹងត្រឡប់មករកអ្នកដើម្បីទទួលចម្លើយនេះវិញ នៅពេលនឹងកន្លែងដដែល ។ សំនួរនេះបានធ្វើមាណពព្រួយបារម្ភជាខ្លាំង ដោយមិនដឹងថា ឆ្លើយត្រូវរបៀបណានោះទេ ដេកមិនលក់ បក់មិនល្ហើយ ព្រោះដឹងថា ថ្ងៃស្លាប់របស់ខ្លួននឹងមកដល់ស្អែកនេះហើយ ។ ដើរផងយំផងតាមដងព្រៃ រអ៊ូ ៗ ពីទុក្ខព្រួយដ៏ធំធេង នៅពេលទៀបភ្លឺ ស្រាប់តែឮសត្វឥន្ទ្រីមួយគូរជជែកគ្នាលើចុងឈើមួយ ញីសួរថា "អ្នកដឹងទេ ហេតុអ្វីបានជាមាណពនោះរអ៊ូថា ខ្លួននឹងត្រូវស្លាប់ថ្ងៃស្អែកនេះ" ឥន្ទ្រីឈ្មោលតបថា "ដោយសារព្រះឥន្ទ្រតាំងសំនួរបី ឱ្យមាណពនោះឆ្លើយ ហើយមាណពនោះឥតចេះឆ្លើយ ដូច្នេះនឹងត្រូវព្រះព្រហ្មកាត់ក្បាលថ្ងៃស្អែកនេះហើយ!" ឥន្ទ្រីញីបន្តសំនួរថា "ចុះសំនួរនោះថាអ្វីខ្លះ?" ឥន្ទ្រីឈ្មោលឆ្លើយដូចដែលព្រះព្រហ្មបានសួរទៅមាណព ហើយឥន្ទ្រីញីក៏សួរបន្តថា "តើអ្នកដឹងចម្លើយទាំងនោះទេ?" ឥន្ទ្រីឈ្មោលក៏តបថា "មនុស្សលោកគេជឿថា ពេលព្រឹករាសីគេនៅលើមុខ -ពេលថ្ងៃត្រង់រាសីនៅដើមទ្រូង -ពេលល្ងាចរាសីនៅចុងជើង" ។ ពោលចប់ មាណពនៅក្រោមដើមឈើបានឮនូវចម្លើយដែលខ្លួនចង់ បានមានសេចក្តីត្រេកអរញញឹមញញែមរួចរត់ទៅផ្ទះ រៀបចំខ្លួន ដើម្បីរង់ចាំជួបគាល់ព្រះឥន្ទ្រាធិរាជ ។ ដល់ពេលកំណត់ព្រះឥន្ទ្រក៏ចុះមក ហែរហមដោយបរិវាព្រះអង្គបានតាំងសំនួរសារជាថ្មី ហើយព្រះអង្គក៏បានទទួល ចម្លើយពីមាណពដូចដែលខ្លួនបានដឹងពីសត្វឥន្ទ្រទាំងគូរនោះ ។ ព្រះឥន្ទ្រាធិរាជទទួលស្គាល់ថា ចម្លើយមាណពនោះ "ត្រូវ" ហើយក៏យកព្រះខណ្ឌមកកាត់ព្រះកេស្មដាក់លើពានមាសជារហូតទៅ ។ ដោយជីវិតព្រះអង្គជាអមតៈ ព្រះកេស្មនោះនៅព្រះជន្មធម្មតាជារហូតមក ហេតុនេះហើយបានជាក្បួនដង្ហែរទេវតា នាថ្ងៃចូលឆ្នាំ គឺការដង្ហែរតែព្រះកេស្មកបិលមហាព្រហ្មតែប៉ុណ្ណោះ ។

**ប្រវត្តិសាស្ត្រដែលនៅសេសសល់ :** ថ្វីត្បិតតែគេពុំដឹងច្បាស់លាស់ថា ព្រះព្រហ្មត្រូវកាត់ព្រះកេស្មពីពេលណាមកក្តី យ៉ាងហោចណាស់ក៏នៅពេលនេះ នៅ ស.វ.អានេះ គេអាចស្រាវជ្រាវរកឃើញថា ចម្លាក់ព្រះព្រហ្មដែលមានតែព្រះកេស្ម គឺមានពីសទវត្សទី១១ នាជំនាន់ព្របាទជ័យវរ្ម័នទី៧សង់អង្គរធំនោះឯងដែរ - គឺជាជំនាន់ដែលមានការផ្សព្វផ្សាយដ៏ធំ១ ហើយជ្រាលជ្រៅពីការទម្លាក់កេត្យានុភាពនៃព្រហ្មញ្ញសាសនា ហើយលើកតំកើងព្រះពុទ្ធសាសនាឱ្យខ្ពស់ឡើង ដូចជារឿង "រាមកេរ្តិ៍" ខ្មែរ ដែលខុសគ្នាពី "រ៉ាម៉ាយ៉ាណា" ឥណ្ឌានោះជាដើម ។ គេចាំថា នាជំនាន់នោះ ព្រះរាជវង្សវរ្ម័នជាខ្សែស្រឡាយវប្បធមិឥណ្ឌា ដែលនាំសាសនាព្រាហ្មណមករីកចំរើននៅ "កាំប៊ូជា" តែខ្សែគ្រួសារខ្មែរនៅទទួលឥទ្ធិពលពីវប្បធមិខ្មែរ-មនជាប់គ្នា និងភូមាជារៀងរហូតមកដែរ ដែលជាហេតុធ្វើឱ្យគេឃើញមានជំនឿលើរូបសញ្ញាក្រពើក្នុងជំនឿពលរដ្ឋធម្មតា និងជំនឿលើរូបសញ្ញានាគរាជនៅរាជវាំង ទន្ទឹមគ្នាជារៀងរហូតមកដែរ ។

**ឥទ្ធិពលនៃភូមិសាស្ត្រ :** រហូតមកដល់សទវត្សទី១៣ ប្រទេសកម្ពុជាមានព្រំប្រទល់ជាប់ភូមា និងចិននៅឡើយ ពុំទាន់មានថៃ-ឡាវ និងវៀតណាមនៅឡើយទេ ។ ពេលនោះថៃ និងឡាវនៅជាកុលសម្ព័ន្ធរបស់ "កាំប៊ូជា" នៅឡើយ ។ នៅក្នុងសៀវភៅប្រវត្តិសាស្ត្រមានចារថា ព្រះបាទជ័យវរ្ម័នទី៧បានពង្រឹងព្រះពុទ្ធសាសនា ក្នុងរជ្ជកាលព្រះអង្គយ៉ាងប្រឹងប្រែង -ព្រះអង្គបានពង្រីករាជវង្សជាមួយនឹងកុលសម្ព័ន្ធ ថៃ និងឡាវ ហើយបញ្ជូនក្បួនតម្រាព្រះពុទ្ធសាសនាដ៏ច្រើនទៅឱ្យក្រុមទាំងពីរនេះផង ។ ភាពរឹងមាំបានធ្វើឱ្យកកើតជាប្រទេសសៀម និងប្រទេសលាវនេះឡើងនៅក្រោយសតវត្សទី១៣ នៅពេលដែលស្តេចខ្មែរជំនាន់បន្តបន្ទាប់ប្រែក្លាយជាប្រទេសព្រាហ្មណវិញ ហើយចង់វាយបំបែកកុលសម្ព័ន្ធទាំងពីរនេះ តែត្រូវគេទប់ទល់តបមកវិញ រហូតដល់រលំក្រុងអង្គរនាខេត្តសៀមរាបនោះទៅ ។

អ្នកនយោបាយបានធ្វើឱ្យមានការប្តូរភូមិសាស្ត្រ ប្តូរសាសនា ប្តូរការគ្រប់គ្រង បានច្រើនបែបសណ្ឋាន ក៏ប៉ុន្តែពុំអាចប្តូរទំនៀមទំលាប់ក្នុងស្រទាប់ពលរដ្ឋបានឡើយ ។ ប្រទេសខ្មែរ -ប្រទេសសៀម ប្រទេសលាវ ប្រទេសភូមា នៅតែប្រារព្ធពិធីបុណ្យចូលឆ្នាំ ដែលមានដើមកំណើតក្នុងព្រហ្មញ្ញសាសនា ក៏ប៉ុន្តែធ្វើទៅតាមទ្រង់ទ្រាយនៃជំនឿរបស់ក្រុមអ្នកកាន់សាសនាថេរវាទទាំងអស់គ្នា ។

**តើគ្រួសារខ្មែរត្រៀមធ្វើអ្វីខ្លះនាឱកាសចូលឆ្នាំរោងនេះ :**

នៅមុខផ្ទះ ឬនៅក្នុងផ្ទះចំទ្វារចូល គ្រួសារនិមួយ ៗ មានរៀបតុក្រាលកំរាលស្រស់ស្អាត មានតាំងទៀនធូប បាច់ផ្កាក្រអូបចំរុះពណ៌ -មាននំចំណីផ្លែឈើស្រស់ ៗ ដាក់ទទួលទេវតាឆ្នាំថ្មី ដែលនឹងចូលមកផ្លាស់វេនទេវតាឆ្នាំចាស់ដែលបាននៅថែរក្សាពលរដ្ឋអស់រយៈពេលមួយឆ្នាំហើយនោះ ។

ក្នុងរយៈពេលបីថ្ងៃនៃពិធីទទួលទេវតាថ្មី នៃឆ្នាំរោង២៥៥៦ ពុទ្ធសករាជនេះ ឪពុកម្តាយទិញខោ -សំពត់អាវថ្មី ៗឱ្យកូនស្លៀកពាក់ -ឱ្យរង្វាន់ជាប្រាក់សម្រាប់ឱ្យកូនដើរកំសាន្ត ជួបជុំបងប្អូនញាតិមិត្ត -ក្រុមយុវជនដើររាំកំសាន្តពីវង់ភ្លេង រាំវង់ពីភូមិមួយទៅភូមិមួយ ធ្វើឱ្យកំលោះក្រមុំចងចាំពីរាត្រីដ៏រីករាយរបស់ខ្លួនមិនគួរឱ្យភ្លេចមួយជីវិត ។

នៅសហរដ្ឋអាមេរិកមានការសែនព្រេន រៀបតុទេវតាដូចគ្នាដែរ តែក្នុងជំនឿមិនបានមុតមាំដូចនៅស្រុកខ្មែរយើងទេ មានខ្លះគេរៀបជារាត្រីកំសាន្តជប់លៀង នៅពេលចូលឆ្នាំជាសាធារណ -ហើយវត្តអារាមក្នុងតំបន់ ក៏រៀបជាពិធីនានា ចែកជូនញាតិញោមពុទ្ធបរិស័ទ ឱ្យមានភាពអ៊ឹកធឹក គួរឱ្យចាប់អារម្មណ៍ណាសដែរ ។ ខុសគ្នាពី ចូលឆ្នាំចិន ដែលគេបិទហាងអស់ដើម្បីទៅសែនដូនតា ប៉ុន្តែចូលឆ្នាំខ្មែរហាងលក់ឥវ៉ាន់ម្ហូបចំណីចំណុក នៅបើកព្រោងព្រាត ដោយពុំមានតាំងតុបតែងអ្វីជាពិសេសប៉ុន្មានទេពីព្រោះម្ចាស់ហាងច្រើនជាកូនចៅចិន គេធ្វើពិធីបុណ្យ ចូលឆ្នាំចិនរួចពី ពីរបីខែមុនទៅហើយ ។ ជាទូទៅ ម្ចាស់ ហាងខ្មែរ-ចិន ពុំមានទំលាប់ឆ្លៀតឱកាសបុណ្យចូលឆ្នាំចិន-ខ្មែរ ឬអាមេរិកាំង លើកកិត្តិយស និងសម្ពស្សហាងពាណិជ្ជកម្មរបស់ខ្លួន ឱ្យគេឯងចាប់អារម្មណ៍ពិសេសណាមួយនៅឡើយទេ ។

ក្រុមគ្រួសារខ្មែរច្រើនក្រីក្រ ពុំសូវមានអ្នកណាសុំឈប់ធ្វើការ ឬទាមទារសិទ្ធិវប្បធមិ ដើម្បីប្រារព្ធពិធីជាតម្លៃដូនតាខ្មែរខ្លួនដែរ សូម្បីតែវត្តអារ៉ាម ក៏មានការកែប្រែកាលបរិច្ឆេទ បុណ្យចូលឆ្នាំ ឱ្យបានអ៊ឹធិក ឱ្យចំពេលចុងសប្តាហ៍ ដើម្បីឱ្យមានការចូលរួមបានច្រើនពីពុទ្ធបរិស័ទដែរ ។

ឆ្នាំឆ្នាំរោងនេះ នឹងប្រារព្ធចំថ្ងៃសុក្រទី១៣ ខែមេសា ដូច្នេះវាជាការងាយស្រួល នឹងសម្រេចយកកាលបរិច្ឆេទបុណ្យត្រឹមត្រូវ ហើយសង្ឃឹមថា បុណ្យចូលឆ្នាំខ្មែរដែលជាវប្បធមិខ្មែរដ៏សំខាន់ នឹងត្រូវបានលើកតំកើងពេញទំហឹង លើសធម្មតាជាមិនខាន ៕

តមកទំព័រទី ១

## តើស្រុកទេសខ្មែរឆ្នាំថ្មី"ឆ្នាំរោងនេះ"

របស់កបិលមហាព្រហ្ម គឺព្រះនាង កិមិរាទេវី ។

ដើម្បីឱ្យមានជោគសិរីសួស្តីចូលមានដល់ជនគ្រប់រូបនាឆ្នាំថ្មីក្រៅអំពីការរៀបចំបោសសំអាតផ្ទះ និងតុបតែងលំនៅឋានត្រៀមលក្ខណៈទទួលព្រះនាង កិមិរាទេវី ជាទេព្តាឆ្នាំរោងដែលនឹងហែហមដោយបរិវារជាទេពធីតា និងទេពនិករប្រមាណមួយសែនកោដិ ។ ព្រះនាងទេពធីតាទ្រង់អម្ពរពណ៌សមានសៀតព្រះកាណ៌ (ត្រចៀក) ដោយផ្កាចង្កុលណីអភរណទ្រង់ពាក់កែវបុស្សរាគ័ម (ត្បូងពណ៌លឿង) និងសោយចេកណាំវ៉ា ចេកទឹកជាភក្សាហារព្រះហស្តឆ្វេងទ្រង់ពិណព្យឯព្រះហស្តស្តាំទ្រង់ព្រះខ័ន ។ ទ្រង់ផ្ទុំបើកព្រះនេត្រគង់លើខ្នងមហិង្សា (ក្របី) ជាជំនិះ ។

ចំពោះរណ្តាប់ និងរបៀបរៀបចំទទួលទេព្តាឆ្នាំថ្មី គឺត្រូវរៀបចំធ្វើនៅចំមុខផ្ទះដោយក្រាលសំពត់ពណ៌សមានរៀបបាយសី៩ថ្នាក់១គូ បាយសី៧ថ្នាក់១គូ បាយសី៥ថ្នាក់១គូ បាយសី៣ថ្នាក់១គូ បាយសីបាឆាម១គូ ស្លាធម៌១គូ ទឹកអប់១គូ ទៀន៥ ធូប៥ លាជ៥ ដាក់លើជើងពាន១គូ ចេកទួន ចេកណាំវ៉ា ដាក់២ជើងពានផ្លែឈើ១១ មុខដាក់លើជើងពាន១១គូ ដូងខ្ចៅ១គូ និងទឹកស្អាត២កែវ ។ ឆ្នាំនេះគួររកចេកណាំវ៉ា និងចេកទឹកដាក់ទទួលទេព្តាផង ព្រោះជាភក្សាហាររបស់ទេពធីតា ។

ក្នុងមហាសង្ក្រាន្តមានគណនាតាំងពីទឹកភ្លៀងពីផលដំណាំ ការធ្វើស្រែចំការ និងមានតម្រាប្រចាំថ្ងៃ និងព្យាករពីជោគជតា តាមថ្ងៃ-ខែ-ឆ្នាំកំណើតផង ។ ចំពោះការគណនាអំពីទឹកភ្លៀងសម្រាប់ឆ្នាំថ្មីនេះ ទំនាយថា នឹងមាននាគពាមកបង្អុរភ្លៀង៥០០មេ ចែកមកឱ្យចក្រវាល២០០មេ ព្រៃហិមពាន្ត១៥០មេ មហាសមុទ្រ១០០មេ និងចែកមកជម្ពូទ្វីបឋានកណ្តាលមនុស្សលោកយើងចំនួន៥០ ។ នៅដើមឆ្នាំមានភ្លៀងធ្លាក់ច្រើនកណ្តាលឆ្នាំភ្លៀងល្អ និងនៅចុងឆ្នាំភ្លៀងតិច ។ ដោយសារតែទឹកភ្លៀងក្នុងជម្ពូទ្វីប មាន៥០មេ ជំនន់ទន្លេ និងទឹកភ្លៀងឆ្នាំនេះ មានក្នុងកម្រិត៨០ភាគ១៦គឺមានសំណល់៨ធ្វើឱ្យទឹកមានជាមធ្យមតែប្រហែលនឹងឆ្នាំកន្លងទៅ។ រីឯផលដំណាំវិញឆ្នាំនេះត្រូវចំកេណ្ឌ០(សូន្យ) មានឈ្មោះថា បាបទំនាយថា: ស្រូវសំណាបស្រែចំការបានផល១ភាគខូច៩ភាគស្រូវដុះល្អ តែពីដំបូងនឹងកើតទុរ្ភិក្ស (អត់បាយ) ប្រជារាស្ត្រនឹងទទួលនូវក្តីទុក្ខលំបាកព្រោះធញ្ញជាតិមានតម្លៃខ្លាំង ។ តំបន់ខ្លះកើតអន្តរាយជាអនេកដោយទុក្ខលំបាកខ្សត់ខ្សោយទ័លក្រ ព្រោះសត្វកណ្តុរស៊ីបំផ្លាញផលដំណាំ ។

គ្រឿងតង្វាយទេវតាឆ្នាំថ្មី

ចំណែកឯកេណ្ឌព្រះអាទិត្យឆ្នាំនេះព្រះអាទិត្យធ្វើដំណើរជិះភ្លើងទំនាយថា: ជាឆ្នាំដែលមានគ្រោះពុំជា នា៧ថ្ងៃក្រោយពីថ្ងៃមហាសង្ក្រាន្តភ្លើង នឹងឆេះក្នុងស្រុករាមគ្រុឌ ខ្លា ពពែ និងស្រុកនាមនាគ រីឯនាមកណ្តុរនឹងកើតទុរ្ភិក្សអត់បាយ ។

អំពីទំនាយថ្ងៃតាមសង្ក្រាន្តវិញ ចូលឆ្នាំថ្ងៃទី១ចំថ្ងៃសុក្រជាថ្ងៃដែលទំនាយថា ថ្ងៃវ័នបតថ្ងៃកណ្តាលត្រូវនឹងថ្ងៃសៅរ៍ ទំនាយថា: ឆ្នាំនោះស្រូវអង្ករ ល្ងរសណ្តែក ផលដំណាំទាំងឡាយបរិបូណ៌ ភ្លៀងព្យុះច្រើន មានរោគឈឺភ្នែកមនុស្សម្នាទាំងឡាយនឹងមានជំងឺស្លាប់ច្រើនហើយនៅចាញ់ឯខាងកូនក្មេង ។ បើទំនាយតាមវេលាចូលសង្ក្រាន្ត ទំនាយថា: ស្រុកទេសនឹងជាពេក ។

**លក្ខណៈមនុស្សកើតឆ្នាំរោង :**

មនុស្សប្រុសស្រី ដែលកើតឆ្នាំរោង នាមជាពស់នាគរាជ ជាតិជាទេវតាប្រុស ធាតុមាសតាមបុព្វបទហោរាទាយថា បុគ្គលពួកនេះមានលក្ខណៈជាមនុស្សរងគ្រោះដល់ជីវិតដោយយកអាសាអ្នកធំ ទោះបីនៅទីកន្លែងណាមានគេជួយឈឺឆ្អាលយកអាសាដូចបងប្អូនមានកម្មពៀរ ខ្លះនាំឱ្យប៉ះទង្គិចមានរបួសព្រោះអ្នកដទៃលោភសក្ការៈតិចច្រើនបានដោយសារស្ត្រី។

តទៅទំព័រទី០៨




# នាំគ្នារំលោភសិទ្ធិមនុស្ស? យ៉ាប់មែន!



---គាត់ទ្រាំលែងបានទៀតហើយ ព្រោះមិត្តភឿនគាត់ជួយក្តៅក្រហាយជំនួសគាត់យូរក្រែលមកហើយដែរ ដោយប្តីគាត់មានស្រី ហើយចេះតែនាំដើរបាត់ៗពីផ្ទះរាល់តែសៅរ៍ អាទិត្យ រួចមកភូតភរគាត់ថា ទៅធ្វើការក្រៅម៉ោងឬម៉ោងបន្ថែម គាត់ចេះតែខំអាណិតប្តី ព្រោះខំរកប្រាក់បន្ថែមមិនហ៊ានឈប់ឈរ ។ មិត្តដែលអាណិតគាត់យករឿងនេះមកប្រាប់គាត់រាល់ពេលឱ្យតែជួបប្តីគាត់បណ្តើរស្រី"ទៅវៃវាឱ្យរៀងម្តងទៅ ចាំពូកអញជួយ ។ អញជួបប្តីឯងបណ្តើរ វាទៅលេងកាស៊ីណូ តាម៉ាហល នៅទីរជៀកស៊្សីរាល់តែដង ឯងព្រមទៅវៃវាទៅ ចាំពូកអញជួយទៅបើកឡានឯងទៅ ចាំយើងទាំង៥នាក់ជិះទៅជាមួយគ្នា ធ្វើឱ្យវាខ្មាស់គេម្តង ធ្វើឱ្យជ្រួលច្របល់កាស៊ីណូម្តងមើល តើវាហោះទៅពួនដល់ឋានណា!"។ គិតហ្មត់ចត់ហើយគាត់ក៏ដាច់ចិត្តធ្វើតាមសំណើររបស់មិត្តគាត់ទាំង៤នាក់ ។ គាត់នាំគ្នាជិះឡានយ៉ាងលឿនកាត់ទីក្រុងហ្វីឡាទៅកាន់កាស៊ីណូតាម៉ាហលនារដ្ឋនីវជឿកស៊ី ដោយប្តេជ្ញាចិត្តថាទៅបង្ក្រាបមេចោរមុខក្រាស់នេះឱ្យខាងតែបាន កុំឱ្យវាដើរយកប្តីគេប្តីឯង បំបែកបំបាក់គ្រួសារគេគ្រប់តែគ្នា ។ ក្រោយពេលចតឡានស្រេចបាច់ហើយ គេទាំង៥នាក់ដើរចូលកាស៊ីណូដោយប្រុងប្រៀបច្បាំងដូចនៅសមរភូមិ ។

ក្តៅដូច្នោះដែរ ភ្នែកសម្លឹងរកមើលគូសត្រូវយ៉ាងប្រុងប្រៀប មិនឱ្យចន្លោះចោលអ្នកលេងល្បែងម្នាក់ណាឡើយ ហើយមិត្តម្នាក់ខ្សឹបតិចៗថា:"នុ៎ះវា! វាស្លៀកខោការបោយខៀវប្រផេះ ពាក់អាវរងាស្តើងដៃវែងពណ៌ប្រផេះដែរនោះ នុ៎ះវាអង្គុយផ្អែកក្បាលលើស្មាប្តីឯងនោះ ទៅចូលក្របួចកវាទៅចាំអីទៀត! ស្រីទាំង៥នាក់រត់ហោទៅ ។

ចាប់កអាវនាងស្រី ដែលជាគូសត្រូវធ្វើឱ្យនាងនោះភ្ញាក់ដូចគេចោល ស្ទះរត់ភីងគ្មានដឹងថា ត្រូវទៅណាទេ តែគិតតែរត់ឱ្យរួចខ្លួនសិន គ្មានគិតថារត់ឱ្យល្អមើលអីទេ ។ សំណាងល្អរបស់នាងដែរ រត់ប៉ះទៅលើភ្នាក់ងារសន្តិសុខ គេក៏មករាំងការពារស្រីៗទាំង៥នាក់ មិនឱ្យដេញតាមគូរសត្រូវទៀត:"ម៉េចបានជា៥នាក់ដេញវាយគេម្នាក់ឯងយ៉ាងណឹង? ឈប់ភ្លាម!"។ ស្រី៥នាក់ស្រែកស្ទើគ្នា:"យើងដេញចាប់មីនោះវាលួចប្តីគេ"។ ភ្នាក់ងារសន្តិសុខនៅតែម៉ឺងម៉ាត់ដដែល:"ប្តឹងប៉ូលិស្តទៅ កុំប្រើហឹង្សាដាក់គេ ប្រយ័ត្នមានទោស គ្នាឯងដល់៥នាក់ផង ឈប់ភ្លាម!"។ អ្នកទាំង៥នាក់មិនទាន់ចង់ឈប់នៅស្ងៀមទេ តែឃើញប៉ូលិស្តដើរតម្រង់មកក៏នៅឈរស្ងៀមទុចង៉ក់ ។ ប៉ូលិសសួរអ្នកទាំង៥នាក់ដោយសំដីគួរសម:"លោកស្រីទាំងអស់មានការអីអាចឱ្យខ្ញុំជួយបានឬទេ?"។ អ្នកទាំង៥នាក់ មានភាពរារែក បាត់ភាពពុះកញ្ជ្រោលពីដំបូង.អ្នកស្រីម្នាក់ក្លាហានជាងគេបានឆ្លើយតិចៗថា:"សុំលោកជួយចាប់មេមួយនោះ វាលួចសាហាយជាមួយប្តីមិត្តរបស់ពួកខ្ញុំ"។ ប៉ូលិសសម្លឹងទៅអ្នកម្ចាស់ខ្លួនដែលប្តីក្បត់ហើយសួរថា:"ប្រុសមួយណាដែលជាប្តីរបស់លោកស្រី?"។

នាងចង្អុលប្តីនាងបង្ហាញប៉ូលិស:"នុ៎ះប្តីខ្ញុំលោក ។ ពេលនោះលោកប្តីមុខឡើងស្លាំងដែរ មិនទាន់ ដឹងត្រូវដោះស្រាយយ៉ាងណា"។ ប៉ូលិសបានឃើញប្តីនាង ហើយក៏ឆ្លើយថា:"ល្អ!ខ្ញុំឃើញប្តីលោកស្រីហើយ ខ្ញុំធ្លាប់ឃើញគាត់មកទីនេះច្រើនលើកហើយ តែដើម្បីឱ្យប្រាកដថា គាត់ជាប្តីលោកស្រីខ្ញុំសុំមើលលិខិតអាពាហ៍ពិពាហ៍ របស់លោកស្រីមើលឱ្យច្បាស់សិនទើបខ្ញុំអាចបំពេញបំណង របស់លោកស្រីបាន"។ អ្នកទាំង៥នាក់ខឹងផងអស់សំណើចផង មួម៉ៅផង:"លិខិតអាពាហ៍ពិពាហ៍? ម៉េចលោកមិនចេញច្បាប់មួយប្រាប់ថា ស្រីៗទៅណាមកណាត្រូវតែកាន់តាមខ្លួននូវលិខិតអាពាហ៍ពាហ៍ ដូចប័ណ្ណបើកបរយ៉ាងចឹងផងទៅ?"។ ប៉ូលិសញញឹម:"រដ្ឋសភាស.រ.អា.ខ្វះចន្លោះត្រង់ណុងមែន តែដើម្បីការពារខ្លួនឱ្យបានផាសុខភាពបរិបូណ៌នឹងសន្តិសុខពេញលេញត្រូវតែជួយខ្លួនឯងខ្លះផង ទៅចាំអីច្បាប់ជួយរំលឹកគ្រប់តែពេលនោះ"។ អ្នកស្រីទាំង៥នាក់ មិនអាចធ្វើឱ្យគូសត្រូវខ្មាស់គេរកកន្លែងពួនមិនបាន បែរជាខ្លួនឯងរកកន្លែងពួនយ៉ាងលំបាកទៅវិញ ។ គាត់សម្លឹងមុខគ្នាឡឹងឡង់សើចទាំងមិនសម:"យ៉ាប់មែនច្បាប់គេនេះរ៉ើយ គេចង់ថាឯង នាំគ្នាប្រើអំពើហឹង្សា រំលោភលើសិទ្ធិអ្នកដទៃទៅវិញ! ធំជាយ៉ាប់មែនស្រុកគេនេះ!"។។

តទៅលេខក្រោយ

តមកពីទំព័រទី ៧

## តើស្រុកទេសខ្មែរឆ្នាំថ្មី“ឆ្នាំរោងនេះ”

ពេលចរចេញដំណើរច្រើនយឺតយ៉ាវ ហើយប្រសិនបើចូលបម្រើអ្នកធំ ឬអ្នកមានទ្រព្យសម្បត្តិគប្បីធ្វើឱ្យសមនឹងកម្លាំង និងសមត្ថភាព បើមិនដូច្នោះទេនឹងត្រូវគេទម្លាក់កំហុកដាក់ជាក់ជាមិនខាន ។ អ្នកកើតឆ្នាំរោងបើបម្រើរាជការវិញនោះ គឺមានការទទួលខុសត្រូវណាស់ហើយ ថែមទាំងមានអំណាច និងទទួលបាននូវកេរ្តិ៍ឈ្មោះល្បីសុះសាយ ជាពិសេសកូនចៅក្រោមឱវាទគោរពកោតខ្លាចឥតឆ្អងទៀតផង ។

ឆ្នាំនេះ ស្រូវអង្ករ ត្រីសាច់ ដំណាំ ផល្លានឹងថ្លៃ និងកើតភ្លើងឆេះកណ្តាលទីក្រុងខុនណាង និងត្រូវទោសទឹកតិចជាងរាល់ឆ្នាំសមណៈជីព្រាហ្មណ៍នឹងក្តៅក្រហាយចិត្ត ។ ឯថ្ងៃអាទិត្យជាថ្ងៃឡើងស័កថ្ងៃចូលឆ្នាំចុងក្រោយទំនាយថា: នៅក្នុងឆ្នាំនេះព្រះមហាក្សត្រនឹងរុងរឿងមានព្រះតេជានុភាព និងមានជ័យជម្នះលើពួកសត្រូវគ្រប់ទិសានុទិស ។

មួយវិញទៀតដោយសង្ក្រាន្តឆ្នាំថ្មីចូលចំថ្ងៃសុក្រ ទី១៣ ខែមេសា គេអាចពិគ្រោះបានទៅលើទេព្តាឆ្នាំរោងពីលក្ខណៈសម្បត្តិព្រះនាងកិមិរាទេវីទៅតាមលក្ខណៈ និងរបៀបតុបតែងនិងការទ្រង់គ្រឿងរបស់ទេពធីតាអង្គនេះ ។ ដូចជាការដែលទ្រង់សោយចេកណាំវ៉ា ចេកទឹកសម្តែងថា ផលដំណាំ កសិកម្ម និងហុចផលល្អបរិបូណ៌ ហើយមានតម្លៃដែលនាំឱ្យមានការទំនាក់ទំនងខាងផ្នែកពាណិជ្ជកម្មជាមួយបរទេស និងមានការនាំចេញនូវផលិតផលខាងកសិកម្មដែលជាផលិតផលកើតមាននៅក្នុងស្រុកមិនខុសពីឆ្នាំកន្លងទៅនោះឡើយ ។

ឆ្នាំកន្លងទៅទេវធីតាប្រើដៃម្ខាងកង្វេរ ហើយដៃម្ខាងទៀតកាន់កាំភ្លើង ។ កង្វេរគឺជាអាវុធដែលសម្រាប់ប្រើទៅលើសត្វដីរដែលជាពាហណៈរបស់ទេវតាដែលសំដៅទៅលើការប្រើប្រាស់ច្បាប់សម្រាប់នគរ ឯកាំភ្លើងជាអាវុធដែលមានប្រសិទ្ធភាពខ្លាំងអាចសម្លាប់សត្រូវនៅទីឆ្ងាយហេតុនេះទើបឆ្នាំកន្លងទៅមានសង្គ្រាមនៅតាមជាយដែន និងមានការប្រើប្រាស់អាវុធជាច្រើននៅក្នុងប្រទេស ។ ខុសប្លែកនៅក្នុងឆ្នាំនេះ ទេពធីតាកាន់ព្រះខ័ន គឺជាអាវុធដែលធ្វើការក្នុងរយៈជិតៗជាអាវុធដែលសម្រាប់ទុកការពារនៅក្បែរខ្លួនមិនមែនជាអាវុធដែលអាក្រក់ខ្លាំងទេ ។ រីឯពិណ្យមិនចាត់ទុកថាជាអាវុធសម្រាប់សម្លាប់មនុស្សឡើយ គឺគ្រាន់តែជាឧបករណ៍តន្ត្រី និងជាឧបករណ៍សម្រាប់កម្សាន្តសប្បាយ ។ តាមសព្វាវុធទាំងពីររបស់ទេពធីតាអាចសម្តែងឱ្យឃើញថា ប្រទេសជាតិនឹងមានសេចក្តីស្ងប់សុខមានតែក្តីសប្បាយរីករាយមិនមានអ្វីគួរឱ្យព្រួយបារម្ភដូចឆ្នាំមុនឡើយ ។

ឆ្នាំនេះទេពធីតាទ្រង់ផ្ទុំទ្រង់បើកព្រះនេត្រនៅលើខ្នងក្របីសម្តែងថា : ក្នុងឆ្នាំនេះពិតណាស់ គឺគ្មានក្តីកង្វល់គ្មានការភ័យព្រួយញញើតញញើមអ្វីឡើយ ។ ព្រះមហាក្សត្ររាជត្រកូលប្រជានិករមានតែសេចក្តីសុខក្សេមក្សាន្ត ប៉ុន្តែការផ្ទុំបើកព្រះនេត្រក៏អាចបញ្ជាក់ថា ត្រូវតែប្រុងប្រយ័ត្នមិនត្រូវធ្វេសប្រហែសទេ ជនខ្លះដូចជានាម៉ឺនខុនណាងនឹងត្រូវ ទោសព្រោះការប្រឆាំងទៅនឹងច្បាប់រដ្ឋផ្សេងៗ ៕

# បទសម្ភាសន៍ជាមួយ Kathy Egmont នាយកសាលា LCCPS នៅឡូវែល

**តពីលេខមុន**

**ខ្មែរផុស :** តើសិស្សខ្មែរនៅសាលាឆាទ័រស្គូលនេះមានប៉ុន្មាននាក់ ?

**ខាទីអេតមនៈ** មានប្រមាណជា២៥០នាក់

**ខ្មែរផុស :** ចំនួននេះច្រើនណាស់ ! ខ្ញុំឮថាសាលានេះមានកម្មវិធីច្រើនសម្រាប់សិស្សដែលមានដើមកំណើតជាខ្មែរ តើកម្មវិធីអ្វីខ្លះ?

**ខាទី :** សិស្សខ្មែរមានចំនួនច្រើននាក់មែន ជាចំនួនពលរដ្ឋខ្មែរដ៏ធំមួយ តែកម្មវិធីដែលយើងមានគឺបើកចំហរជូនសិស្សទាំងអស់គ្នា... យើងធ្លាប់បើកកម្មវិធីរៀនភាសាខ្មែរ តែត្រូវបិតទៅវិញដោយមានតែសិស្ស២-៣នាក់ប៉ុណ្ណោះមក បើមានសិស្សចង់រៀន"ភាសាពិភពលោក"ច្រើន យើងសង្ឃឹមថា នឹងបើកឡើងទៀត ។យើងមានកម្មវិធីសម្រាប់បង្កើនទេព្យកោសល្យកុមារ ដូចជាក្មេងសាលាមុននិងក្រោយពេលរៀនធម្មតា ចេញថ្លៃមួយដុល្លារក្នុងមួយថ្ងៃ ការសិស្សខ្មែរច្រើនក្នុងកម្មវិធីមួយនេះ យើងមានកម្មវិធីកីឡាដែលមានសិស្សជាប់ជាយុវជនចូលប្រកួតនៅអូឡាំពិក វាយបោះបាល់ក្រុមលើកទឹកចិត្តកីឡាករ... ។ល ។ ក្មេងគ្រប់សាសន៍ហាត់ហ្វឹកហ្វឺនជាមួយគ្នា ។ កម្មវិធីក្រោយពេលរៀន មានវិជ្ជាធនាគារ រៀនលេងអុក មានក្រុមនារី មាននិស្សិតមកពីមណ្ឌលសិក្សាផ្សេងៗមកជួយណែនាំធ្វើមេរៀនដល់សិស្សសប្តាហ៍ម្តងយើងមានថ្នាក់ដែលមានឈ្មោះថា "វប្បធម៌ពិភពលោក" ដូចជាសប្តាហ៍នេះ យើងមានថ្នាក់រៀនអំពីវប្បធម៌ខ្មែរស្តីអំពី"ស្តេចស្វា" ជូនសិស្សគ្រប់សាសន៍ឱ្យសិស្សឯទៀតៗអាចស្គាល់ពីវប្បធម៌ខ្មែរបាន ដូច្នេះសិស្សម្នាក់អាចនិយាយថា រឿងនេះមកពីស្រុកខ្ញុំ ឬក៏សិស្ស អាហ្វ្រិកថា រឿងនោះមកពីស្រុក គេដែរ...

**ខ្មែរផុស :** នេះគេអាចនិយាយបានថា គឺជាវប្បធម៌ខ្មែរថ្មីមួយដែលសិស្សត្រូវរៀនឱ្យស្គាល់ពីប្រទេសដ៏ទៃផ្សេងទៀតរៀនពី ជនជាតិជិតខាងខ្លួន ហើយមានទំនាក់ទំនងគ្នា...

**ខាទី :** នៅមានការសំខាន់មួយ ទៀតដែលសិស្សត្រូវតែចេះដែរ គឺការបង្កើន"សំឡេង" ដែលថានេះ គឺជាប្រទេសខ្ញុំ ដែលមានគុណសម្បត្តិមួយម្នាក់ទៀតថា នេះក៏ប្រទេសខ្ញុំដែរ ខ្ញុំក៏មានគុណសម្បត្តិដែរ... ឥឡូវនេះយើងរួមគ្នាជាសហគមន៍ ហើយសហគមន៍ យើងមានគុណសម្បត្តិច្រើន ដែលរួមផ្គុំគ្នាដោយ លក្ខណៈខុសៗគ្នា ដូចជាខ្លះចូលចិត្តស្ងប់ស្ងាត់ ស្រួលចុះសម្រុងជាមិត្តខ្លះទៀតចូលចិត្តចលនាធ្វើសម្លេងក្តុងក្តាំងដែលសុទ្ធតែជាតម្លៃនៃវប្បធម៌នីមួយៗយើងចង់ឃើញក្មេងទាំងអស់មានមោទនភាពចំពោះអ្វីដែលជាតម្លៃរបស់ពួកគេ ហើយក្មេងទាំងនោះមានការជឿជាក់ថាខ្លួនគេមនុស្សដឹកនាំគេបាន ទោះជាមកពីសាសន៍ណាក៏ដោយ ។

**ខ្មែរផុស :** តើអ្នកប្រាប់ពីលទ្ធផលនៃកម្មវិធីរបស់សាលាឆាទ័រស្គូលនេះបានទេ... ខ្ញុំចង់និយាយថា ពីសហគមន៍ខ្មែរដែលគ្រួសារមាន "រនាំងគ្រួសារ" ក៏រិតសិស្សខ្មែរបោះបង់សាលានៅខ្ពស់ជាងគេ តើលទ្ធផលនៃវប្បធម៌ថ្មីមានការផ្លាស់ប្តូរពីភាពធម្មតានេះទេ ?

**ខាទី :** សាលាយើងមានតែត្រឹម (6grad) កំរិត៦ -លទ្ធផលគឺយើងបង្រៀនឱ្យសិស្សយើងចង់បន្តរៀនទៅមហាវិទ្យាល័យ ដែលយើងចាប់ផ្តើមណ្តុះ សិស្សពីអាយុ៤ឆ្នាំ សួរអំពីក្មេងចង់ទៅមហាវិទ្យា- ល័យណា -ចង់ធ្វើអ្វី -គោលដៅគឺផ្តល់នូវចំណេះ -ផ្តល់ភាសាអង់គ្លេសគ្រប់គ្រាន់ចេះឆ្ងល់ចង់រៀន -ក្មេងមានទំនុកចិត្តអាចទៅដល់ទីណាក៏ដោយ គេអាចរៀនសូត្របាន ហើយក៏អាចជាអ្នកនាំគេបាន... យើងឃើញសិស្សដែលបានបញ្ចប់ថ្នាក់ពីយើងនេះ ទៅមហាវិទ្យាល័យ សិស្សបានបោះបង់សាលាទេ... ខ្ញុំឃើញសិស្សកំពុងរៀនបន្ត ខ្ញុំឮដំណឹងល្អៗថា មានខ្លះជាកីឡាករដែលរឹងមាំសម្រាប់ការសិក្សាខ្លះខំបណ្តុះខាងសិល្បៈខាងភ្លេង...ដែលក្មេងនាំយកនូវអំណោយផល ជាច្រើនទៅបន្តនៅវិទ្យាល័យបន្តិចទៀតយើង និងបើកថ្នាក់ដល់កំរិត៨យើងនឹងតាមគាំទ្រសិស្សនៅវិទ្យាល័យ?ដើម្បីបញ្ជូនទៅមហាវិទ្យាល័យបាន ។

ខាទីអេតមន

**ខ្មែរផុស :** មាតាបិតាខ្មែរជាច្រើនមកដល់ ស.រ.អា នេះ ដោយមានកំរិតសិក្សាតិចតួច តើអ្នកមានទទួលអារម្មណ៍ទាំងនេះទេ?

**ខាទី :** ខ្ញុំមានអារម្មណ៍ថា ម្តាយឪពុកទាំងនោះ ហាក់ដូចជាមិនសូវក្លាហាននឹងនិយាយមកកាន់យើងខ្ញុំទេ ខ្ញុំគិតថា ពួកគាត់ត្រូវការកន្លែងសុវត្ថិភាពសម្រាប់កូនចៅគាត់ -ពេលខ្ញុំចូលមកដល់សាលានេះ យើងបានធ្វើ Test ធ្វើមិនបានល្អទេ ទើបតែឆ្នាំនេះធ្វើបានល្អ តែបើរៀនវិញសិស្សធ្វើបានល្អណាស់ ឪពុកម្តាយខ្មែរមិនពូកែតវ៉ាអ្វីទេ បើខ្ញុំនិយាយជាមួយក្រុមស្ប៉ានីស គេនឹងប្រាប់ខ្ញុំអំពីអ្វីទាំងអស់ដែលគេចង់និយាយទេក្រុមអាហ្វ្រិកាំងក៏ដូចគ្នាដែរ តែក្រុមខ្មែរ គួរ សមណាស់ទាល់តែខ្ញុំសួរថា "ម៉េចខឹងនឹងខ្ញុំទេ?" ទើបគេសើចដាក់ខ្ញុំពួកគាត់មិនស្រែកឱ្យខ្ញុំទេ ។

**ដេប៉ូរ៉ា :** កូនខ្មែរគឺមានទម្លាប់គោរពគ្រូបង្រៀនណាស់ បើទោះជាមានការណែនាំពីគ្រូអ្វីក៏ដោយ ឪពុកម្តាយណែនាំកូនឱ្យគោរពតាមគ្រូជានិច្ចនេះជាវប្បធម៌ខ្មែរ ពេលខ្លះការណែនាំរបស់គ្រូនោះមិនត្រឹមត្រូវក្តីក៏គាត់មិនសួរប្រឆាំងនឹងគ្រូឡើយ ។


ដេប៉ូរ៉ា ម៉ូទី

**ខ្មែរផុស :** មានដែលឮទេថា ឪពុកម្តាយខ្មែរនៅពេលនាំកូនទៅជួបគ្រូនៅសាលាជាលើកទី១ តែងនិយាយថា "ខ្ញុំប្រគល់កូនខ្ញុំជូនលោកគ្រូ អ្នកគ្រូហើយសូមជួយប្រដៅវាផងចុះទុកតែភ្នែក និងឆ្អឹងឱ្យខ្ញុំវិញបានហើយ" ។

**ខាទី :** គួរឱ្យចាប់អារម្មណ៍ខ្លាំងណាស់! ខ្ញុំគិតថា សិស្សទាំងអស់នៅពេលមកដល់មានបញ្ហាជាមួយភាសាអង់គ្លេសជាខ្លាំង មិនថាតែខ្ញុំទេពេលធ្វើ Test សំនួរនោះទូលំទូលាយពេក ដូចជាត្រូវដឹងពីអាទិទេពជាតិក្រិច ឬរ៉ូម៉ាំង យល់ពីរូបសញ្ញា ស្គាល់ន័យជាភាសាអង់គ្លេស -អត្ថបទក្នុងន័យអរូបិយឱ្យសិស្សឆ្លើយថា តើគេយល់យ៉ាងណា? ខ្ញុំដឹងថា ទោះជាឪពុកម្តាយក៏ជួយមិនបានពីព្រោះមិនដែលបានអាននូវអត្ថបទដ៏លំបាករបៀបនេះទេ -អ្វីៗក៏ថ្មីទាំងអស់សម្រាប់ពួកគេ -យើងត្រូវបង្រៀនឱ្យបានច្រើន ដូចជានិយាយអំពីការនេសាទសមុទ្រ គឺសិស្សពិបាករៀនណាស់ពីព្រោះគេមិនដែលទាំងជិះទូកចុះសមុទ្រម្តងណាសោះ ម្ល៉ោះហើយត្រូវប្រឹងក្រេបយកជញ្ជក់យកចំណេះ ដូចក្រណាត់ជក់ទឹកអ៊ីចឹង ។

**ខ្មែរផុស :** តើសហគមន៍ខ្មែរខុសគ្នាពីសហគមន៍ផ្សេងៗឬទេ ?

**ខាទី :** ខ្ញុំយល់ថា សហគមន៍និមួយៗមានវប្បធម៌ផ្ទាល់ខ្លួន ក៏ប៉ុន្តែមកជាជនអន្តោប្រវេសន៍មានបញ្ហាដូចគ្នាទាំងអស់ -គ្រួសារមួយមកពីកេនិញ៉ា ក៏ដូចជាគ្រួសារខ្មែរ **តទៅទំព័រទី២១**

# មានអ្វីប្លែក ?

I **ញូវយ៉ក :** អង្គការសង្គមស៊ីវិលចំនួន៨ នៅអាមេរិក និងកាណាដាបានចូលទៅធ្វើសេចក្តីថ្លែងការណ៍



នៅអង្គការសហប្រជាជាតិផ្នែកខាងសិទ្ធមនុស្ស ដើម្បីថ្កោលទោសចំពោះប្រទេសចិន ប្រទេសវៀតណាម និងប្រទេសកម្ពុជា ថាបានប្រកាន់នយោបាយ ដែលរំលោភដល់សិទ្ធមនុស្ស និងសិទ្ធពលរដ្ឋយ៉ាងធ្ងន់ធ្ងរ។

ខាងកម្ពុជាតំណាងដោយ គណបក្ស សម រង្ស៊ី នៅហ្វីឡាដែលហ្វៀ គឺលោក មាស ជា និងលោក រស់ វិសាល បាននាំលិខិតតំណាងឱ្យគណបក្សរបស់ខ្លួនថ្លែងរំលឹកពីការរំលោភរបស់រដ្ឋាភិបាលខ្មែរ ប្រមូលកម្លាំងកៃលើតែនាយករដ្ឋមន្ត្រី ហើយរំលោភសិទ្ធពលរដ្ឋ សិទ្ធគណបក្ស យកទាហ៊ាន ប៉ូលិស ទៅបណ្តេញអ្នកស្រុកអ្នកភូមិ យកដីធ្លីគេកាន់កាប់ រំលោភទាំងសភាជាតិ ទាំងអង្គការតុលាការ ជាពិសេសរំលោភស្មារតីនៃសន្ធិសញ្ញាក្រុងប៉ារីសឆ្នាំ១៩៩១ ថែមទៀត ហើយបានសុំឱ្យ អ.ស.ប និងសហរដ្ឋអាមេរិកធ្វើអន្តរាគមន៍ ដើម្បីកែប្រែស្ថានភាពគ្រប់គ្រងជាតិជូនប្រជាពលរដ្ឋខ្មែរ។

តំណាងអង្គការទាំង៨មានគ្នា១៧បាននាំលិខិតសម្តែងការខកចិត្តរៀង១ខ្លួនជូនតំណាងគណកម្មការសិទ្ធមនុស្ស អ.ស.ប លោក ថម ឡែនថស នៅបូរីញូវយ៉កនាថ្ងៃដដែលនោះ។

II **ភូមា :** ប្រទេសភូមា ឬមីយ៉ាន់ម៉ាកំពុងតែមានការប្រែប្រួល **តទៅទំព័រទី ២១**











# ព្រះសង្ឃមានសង្ឃដីការពីទេវតានិងជំនឿផ្សេងៗបុណ្យចូលឆ្នាំខ្មែរ


ព្រះគ្រូគម្ពីរវិសុទ្ធសក្យមុនីបុត្តោជាសុមាលា


ពិធីផ្ទេរតំណែងទេវតាឆ្នាំចាស់ និងឆ្នាំថ្មី

**ពីមុនមកប្រជាពុទ្ធបរិស័ទខ្មែរ បានជឿជាក់និងគោរពប្រតិបត្តិនូវព្រហ្មញ្ញសាសនា ដែលបានហូរចូលមកប្រទេសកម្ពុជាយើងមុនព្រះពុទ្ធសាសនាទៅទៀត ។ ហេតុដូច្នោះហើយបានជាពុទ្ធបរិស័ទខ្មែរបានធ្វើពិធីខ្លះៗតាមបែបព្រហ្មញ្ញសាសនានៅក្នុងពិធីបុណ្យចូលឆ្នាំប្រពៃណីជាតិរបស់ខ្លួន។ តើហេតុអ្វីបានជាគេធ្វើពិធីបុណ្យបង្សុកូលស្រង់ព្រះពិធីពូនភ្នំខ្សាច់ ងូតទឹកជូនអ្នកមានគុណចម្រុះគ្នាក្នុងពិធីនេះ...?**

●●●ឆ្នាំចាស់ផ្លាស់ចូលឆ្នាំថ្មីមកដល់ការផ្លាស់ប្តូរវេនរបស់ទេវតាវិលជុំក្នុងចំណោមទេវតាស្រីទាំង៧របស់កបិលមហាព្រហ្មក៏មកដល់ដែលជាទំនៀមទម្លាប់ប្រពៃណីចូលឆ្នាំខ្មែរ។ តើក្នុងគម្ពីរព្រះសម្មាសម្ពុទ្ធមានចែងពីមានទេវតានៅឋានលើដែរ ឬទេ? ពាក់ព័ន្ធនឹងចម្ងល់នេះព្រះគ្រូគម្ពីរវិសុទ្ធសក្យមុនីបុត្តោជាសុមាលា គង់នៅវត្តសំពៅមាសមានថេរដីការបកស្រាយសំណួរតំណាងខ្មែរអប្សរាដូចខាងក្រោម :

**●នៅក្នុងដំណើររឿងដែលនាំមកនូវការប្រារព្ធពិធីបុណ្យចូលឆ្នាំខ្មែរ គឺមានទេវតាទាំង៧របស់កបិលមហាព្រហ្មផ្លាស់ប្តូរវេនគ្រប់គ្រងឆ្នាំនីមួយៗ តើនៅក្នុងគម្ពីរព្រះពុទ្ធសាសនាមានចែងពីជំនឿទេវតាទេ? តើមានទេវតាពិតដែរ ឬទេ?**

-ពិធីបុណ្យចូលឆ្នាំជាប្រពៃណីរបស់ខ្មែរយើង ដែលថា ទេវតាទាំង៧របស់កបិលមហាព្រហ្មគឺមានពិតមែនទៅតាមការតាក់តែងឡើងរបស់អ្នកជំនាន់ក្រោយតៗមកទៀត ដែលគេទទួលស្គាល់ថា ជាប្រពៃណី។ ហើយឈ្មោះកបិលមហាព្រហ្ម និងទេវតាទាំង៧ គ្មានការអះអាងប្រាកដនៅក្នុងព្រះត្រៃបិតកទេ ។ តែបើនិយាយពីទេវតាវិញព្រះពុទ្ធសាសនាក៏មានសម្តែងពីទេវតាថា មានពិតដែរ តែទេវតាដែលបានចុះមកថែរក្សាព្រះកេសកបិលមហាព្រហ្មនោះ នៅក្នុងព្រះពុទ្ធសាសនាមិនបានបញ្ជាក់អំពីរឿងព្រហ្មដែលត្រូវដាច់ក្បាលធ្លាក់ទៅក្នុងមហាសមុទ្រត្រូវរីងទឹកស្ងួត ឬធ្លាក់ទៅលើផែនដីបង្កបង្កើនមិនបានផល ឬបោះទៅលើអាកាសគ្មានភ្លៀងអ្វីនោះ គឺអត់ទេ ដែរ ។ ពោលគឺព្រហ្មជាអ្នកមានអំណាច **តទៅទំព័រទី១៣**


សកម្មភាពក្នុងពីស្រង់ព្រះ

តមកពីទំព័រទី ១២

# ព្រះសង្ឃមានសង្ឃដីកាពីទេវតា...

ឫទ្ធិដែលកកើតឡើងពីក្តីមេត្តាករុណា មុទិតា និងឧបេក្ខា ។

**•តើការប្រារព្វពិធីបុណ្យចូលឆ្នាំរបស់ពុទ្ធបរិស័ទខ្មែរ គឺធ្វើដើម្បីអ្វី ?**

-ការប្រារព្វពិធីបុណ្យចូលឆ្នាំខ្មែរដែលតែងតែធ្វើជារៀងរាល់ឆ្នាំនោះ គឺគេធ្វើដើម្បីរក្សាគំណប្រពៃណីខ្មែរដែលបានធ្វើជាយូរលង់មកហើយ ។ ម្យ៉ាងវិញទៀត គឺគេធ្វើទៅតាមចន្ទគតិដែលហោរាសាស្ត្របានគិតទៅតាមថ្ងៃខែរបស់ខ្មែរយើងដែលមានចេត្រពិសាខ... ។

**•តើការប្រារព្វបុណ្យចូលឆ្នាំខ្មែរតាមបែបព្រហ្មញ្ញសាសនាឬព្រះពុទ្ធសាសនា?**

-នៅក្នុងពិធីនេះ គឺមានលាយឡំចម្រុះគ្នាទាំងព្រហ្មញ្ញ ទាំងព្រះពុទ្ធសាសនា ប៉ុន្តែនៅក្នុងនោះដែរ យើងត្រូវមើលថា តើអ្វីជាព្រះពុទ្ធសាសនា អ្វីជាព្រហ្មញ្ញសាសនា ។ ដូចជាយើងស្រង់ព្រះ គឺធ្វើតាមបែបព្រះពុទ្ធសាសនាសុទ្ធសាធដែលគេសាងព្រះពុទ្ធរូប ហើយពុទ្ធបរិស័ទខ្លះគាត់បានទៅសម្អាតព្រះក្នុងវិហារ ឬក្នុងសាលាឆាន់មានកន្សែងស្អាតបាញ់ទឹកអប់ជាដើម និងខ្លះទៀតគេធ្វើជារោងបុស្សបុកដែលមានយាងព្រះអង្គថ្មកែវដាក់ចំកណ្តាលផ្ទៃវត្ត ហើយគេធ្វើពិធីស្រង់ព្រះ ដោយយកទឹកទៅចាក់ពីលើហើយយកទឹកនោះមកលុបមុខ ព្រោះគេយល់ថា ដើម្បីនាំមកនូវសិរីសួស្តីត្រជាក់ត្រជំ

សកម្មភាពក្នុងពិធីស្រង់ព្រះ

បានសេចក្តីសុខចម្រើន ។ ចំណែកឯពិធីពូនភ្នំខ្សាច់វិញនោះមិនមែនជាព្រះពុទ្ធសាសនាទេ ។ នៅក្នុងសាស្ត្រា ស្លឹករឹតដែលនិយាយរឿងនាងសុវណ្ណឪរ៉ៃអណាំង លោកិយសេរីទេវបុត្រដែលបានថែងថា បើរាប់គ្រាប់ខ្សាច់អស់ទៅនឹងបានរំដោះកម្មពៀរ ។ នេះ គឺជារឿងព្រហ្មញ្ញសាសនាទេ ។

**•តើមានទេវតាពិតដែរ ឬទេ ហើយបើមាននឹងមានសណ្ឋានខុសគ្នាបែបណាខ្លះ?**

-នៅក្នុងព្រះពុទ្ធសាសនាបានសម្តែងថា ទេវតាមាន៦ជាន់មានជាន់ ចាតុមហារាជិការ ជាន់តាវតឹង្ស ជាន់យាមា ជាន់តុសិទ្ធ ជាន់និមារតី និងជាន់បរនិមសារវតី ។ ចំពោះទេវតាជាន់ទី១គឺនៅលាយឡំជាមួយនឹងមនុស្សលោកដែលនៅនឹងចង្កេះភ្នំព្រះសុមេរុដែលមានបែងចែកទៅជាយក្សសណ្តប អសល្យ ពួកគ្រុឌ ពួកនាគ និងមានដូចជារុក្ខទេវតាជាដើម។ ភូមិទេវតាមានព្រះវិហារជាទីថែរក្សាមានផ្ទះរបស់អ្នកស្រុកនៅក្នុងព្រៃនៅក្នុងសមុទ្រអាកាសជាដើម។ ចំណែកឯទេវតារក្សាជារួម ដូចជាទេវតាសក្កទេវរាជឋិតនៅឋានតាវតឹង្ស គឺមានទីតាំងនៅកំពូលភ្នំព្រះសុមេរុដែលមានសក្កទេវរាជជាអ្នកគ្រប់គ្រងនិងមានមាតសលី ទេវបុត្របរថថ្វាយដល់ព្រះឥន្ទដែលមានទេពអប្សររាប់ពាន់មានវិមានមាសវិមានប្រាក់សម្រាប់ជាសម្បត្តិទិព្វសោយអាហារទិព្វមានរតនសម្បត្តិរបស់ទេវតាទាំង១០ ដែលជាគ្រឿងសោយសុខរបស់ពួកទេវតា ។

**•តើមានទេវតាកើតឡើងដោយបុណ្យ និងមានទេវតាកើតឡើយដោយអំពើបាបទេ?**

-ចំពោះអស់ពួកទេវតាគ្មានទេវតាណា មួយកើតឡើងដោយអំពើបាបទេ។ ប៉ុន្តែមានទេវតាមួយពួកនោះកើតឡើងដោយសារបុណ្យដែរ តែមានអំពើបាបចូលមកបៀតបៀនដូច្នេះបុណ្យនោះក៏ខ្សត់ខ្សោយដែរ ។ ប៉ុន្តែអត់អាហារបរិភោគ ដើរលិទ្ធដើរក្រេបដូចជាពេលភ្ជុំបិណ្ឌ ដែលគេបោះបាយបិណ្ឌ គឺបោះឱ្យពួកទេវតា ដែលខ្វះបុណ្យ នោះឯង ហើយពួកនោះទទួលបុណ្យបានតាមរយៈអ្នកធ្វើឧទ្ទិសទាននោះឯងទើបបានទៅដល់ ។

តទៅទំព័រទី១៦

# ស្តាប់គ្រូចិនសែទស្សន៍ទាយជំនឿផ្សេងៗក្នុងឆ្នាំរោង២០១២

នៅក្នុងឆ្នាំរោង២០១២នេះ មានប្រជាពលរដ្ឋភាគច្រើន ទាំងខ្មែរនិងចិនក៏ដូចជាប្រជាពលរដ្ឋនៅអាស៊ី តែងចាត់ទុកថាជាឆ្នាំល្អ និងជានាគមាសទៀតផង ។ ការចាប់អារម្មណ៍នេះមិនមែនតែនៅឆ្នាំរោងទេ ពោលគឺឱ្យតែជិតដល់ឆ្នាំថ្មីជិតចូលមកដល់ម្នាក់ៗចង់ដឹងថា តើនៅក្នុងឆ្នាំថ្មីខាងមុខនោះ ជីវិតរស់នៅការងាររកស៊ី ការប្រកបកិច្ចការអ្វីៗនឹងទៅជាយ៉ាងណាដែរ? ។ ទាក់ទិនទៅនឹងជំនឿផ្សេងៗនេះ លោកគ្រូចិនសែយ៏ល្បីម្នាក់ឈ្មោះ លោកគ្រូ ចាំង ចាំងឡុង នៅរាជធានីភ្នំពេញដែលឧស្សាហ៍ ឡើងចុះទៅក្រៅប្រទេសជាញឹកញាប់នោះបានទស្សន៍ទាយអំពីជំនឿផ្សេងៗនៅក្នុងឆ្នាំរោង២០១២នេះ...។

•••គ្រូចិនសែ ចាំង ចាំងឡុង បានពន្យល់ថា យោងតាមក្បួនហោរាសាស្ត្ររបស់ចិនទាល់តែគម្រប់៦០ឆ្នាំទើបប្រែធាតុម្តង ។ ប្រសិនបើនិយាយអំពីឆ្នាំដែលល្អលេខមួយនោះ គឺឆ្នាំមមីដែលកើតកាលពីឆ្នាំ ១៩៧៨ និងឆ្នាំជូតកើតកាលពីឆ្នាំ១៩៧១ ។ លោកគ្រូបានបញ្ជាក់ថា ឆ្នាំរោងពិតជាឆ្នាំល្អមែន ព្រោះមនុស្សដែលកើតក្នុងឆ្នាំនេះ ច្រើនតែមានភាពវៃឆ្លាតរហ័សរហួនរស់រវើក និងមានឫទ្ធិអំណាច ។

លោកគ្រូបានបន្តថា មិនមែនតែឆ្នាំមួយល្អនោះទេ គឺត្រូវគួបផ្សំជាមួយខែថ្ងៃព្រមទាំងម៉ោងផងដែរ ។ ឆ្នាំរោងតំណាងឱ្យសត្វនាគ ដែលជាសត្វមានឫទ្ធិអំណាចដ៏អស្ចារ្យរស់នៅលើមេឃ ហើយក៏អាចចុះមកនៅក្នុងទឹកបានដែរ ។ សម្រាប់ជនជាតិចិនគេយកសត្វនាគជាតំណាងនាំមកនូវលាភសំណាង និងអំណាច ។ លោកគ្រូបានប្រាប់ថា សម្រាប់ហោរាចិនមិនដូចខ្មែរទេ ឆ្នាំនីមួយៗត្រូវផ្លាស់ប្តូរធាតុជានិច្ច ឧទាហរណ៍ ខ្មែរឆ្នាំរោងសត្វនាគធាតុមាសឯក្បួនចិនសែឆ្នាំរោងក្នុងឆ្នាំ២០១២នេះ គឺធាតុទឹកទៅវិញដែលធាតុទឹកនោះជាទឹកសាបទឹកទន្លេហូរទៅឆ្ងាយ ដូច្នេះមិនកើតមានគ្រោះមហន្តរាយធម្មជាតិធ្ងន់ធ្ងរ ដូចជាបណ្តាឆ្នាំកន្លងទៅនោះទេ ។

លោក ចាំង ចាំងឡុង បានប្រាប់បន្តទៀតថា បើសម្រាប់នៅស្រុកចិនវិញនោះក្នុងឆ្នាំរោងឆ្នាំ២០១២នោះ នឹងកើតមានគ្រោះធម្មជាតិច្រើន


លោក ចាំង ចាំងឡុង

គឺនឹងមានគ្រោះទឹកជំនន់នៅភាគខាងជើង ហើយនឹងកើតមានគ្រោះរាំងស្ងួតនៅភាគខាងត្បូង ។ ចំណែកឯប្រទេសកម្ពុជាយើងក៏ទទួលរងនូវចំហាយនិងផលប៉ះពាល់ទាំងនោះដែរ ដោយសារឆ្នាំរោងនេះ ជាធាតុទឹកទន្លេ ។ ដូច្នេះអ្នកដែលរស់នៅតាមដងទន្លេនឹងត្រូវរងគ្រោះដោយទឹកជំនន់ ហើយអាចនឹងមានទំហំធំជាងឆ្នាំ២០១១ទៅទៀត តែក៏មានកន្លែងខ្លះបានជួបប្រទះនូវគ្រោះរាំងស្ងួតផងដែរ ។ ចំពោះអ្នកដែលកើតឆ្នាំរោង បើជាមនុស្សប្រុស គឺឆុងនៅខែមករា ចំណែកឯស្ត្រីវិញឆុងនៅខែកក្កដា ដូច្នេះធ្វើអ្វីមួយតោងឱ្យមានការប្រុងប្រយ័ត្នមែនទែន ។ ហោរាសាស្ត្ររូបនេះបានបន្ថែមផងដែរថា ប្រុសស្រីណាដែលកើតនៅក្នុងឆ្នាំរោងឆ្នាំ២០១២នេះ គឺឆុងជាមួយអ្នកកើតឆ្នាំច ។ ចំណែកអ្នកដែល កើតនៅឆ្នាំចក៏មិនគួរយកកូនដែលកើតក្នុងឆ្នាំរោងឆ្នាំ២០១២នេះដែរ ព្រោះឆុង ហើយនឹងអាចបណ្តាលឱ្យជួបនូវគ្រោះមហន្តរាយវិនាសហិនហោច ទ្រព្យសម្បត្តិ និងអាចធ្វើឱ្យមានគ្រោះថ្នាក់ដល់អាយុជីវិតថែមទៀតផង ។

លោកគ្រូបានប្រាប់ទៀតថា នៅក្នុងឆ្នាំរោងនេះ សម្រាប់ភោគផលដំណាំរបស់កសិករនឹងទទួលបាននូវផលច្រើន ប៉ុន្តែក៏ត្រូវខូចខាតដោយអន្លើៗផងដែរ ដោយសារគ្រោះធម្មជាតិ ។ ឆ្នាំរោងនៅក្នុងខែមេសានឹងកើតមានគ្រោះភ័យច្រើនដូចជាគ្រោះថ្នាក់ចរាចរណ៍ និងគ្រោះអគ្គិភ័យច្រើន ដូច្នេះគួរតែមានការប្រុងប្រយ័ត្នឱ្យបានខ្ពស់ ។ រីឯខែតុលានឹងកើតមានគ្រោះទឹកជំនន់ផងដែរ ។ ចំពោះមនុស្សណាដែលកើតមកមានធាតុមាស និងដីតោងប្រយ័ត្នប្រយែងឱ្យមែនទែន ព្រោះអាចនឹងកើតមានគ្រោះអគ្គិភ័យផ្ទះសម្បែង និងទ្រព្យសម្បត្តិដោយយថាហេតុ ។ ឆ្នាំនេះនឹងកើតមានគ្រោះភ័យច្រើនចំពោះអ្នក

តទៅទំព័រទី១៦

តមកទំព័រទី ១៣

## ព្រះសង្ឃមានសង្ឃដីកាពីទេវតា...

**•តើការពូនភ្នំខ្សាច់ ស្រង់ព្រះ ឬក៏ធ្វើពិធីកម្មផ្សេងៗនៅក្នុងពិធីបុណ្យចូលឆ្នាំខ្មែរនេះមានអត្ថន័យដោយឡែកៗពីគ្នាយ៉ាងម៉េចដែរ?**

-ពិធីស្រង់ព្រះ គឺមានអត្ថន័យខុសគ្នាពីពូនភ្នំខ្សាច់ ហើយក៏ខុសគ្នាអំពីការស្រង់(មុជទឹក)មាតាបិតាដែរ ។ អ្វីដែលពុទ្ធបរិស័ទធ្វើគឺសុទ្ធតែមានប្រយោជន៍ទាំងអស់ដែលការស្រង់ព្រះប្រយោជន៍សម្អាតព្រះពុទ្ធរូបក្នុងមួយឆ្នាំម្តង ។ មួយទៀតសម្តែងដល់កូនខ្មែរឱ្យចេះគោរពព្រះពុទ្ធរូប និងឱ្យចេះស្រឡាញ់ព្រះពុទ្ធសាសនា។ អំពីរឿងពូនភ្នំខ្សាច់គិតពីជំនឿជឿថា ជាការរំដោះបាបរំលោះកម្មរំលោះពៀរ ដោយមានពូនភ្នំខ្សាច់ដាក់លុយ និងអុចធូបជាដើមនោះ តែមិនមែនចំជាព្រះពុទ្ធសាសនាអីទេ។ ចំពោះបាបកម្មដែលបុគ្គលណាធ្វើនោះ គឺវាក្តៅក្រហាយរួចទៅហើយ ហើយអំពើបាបមិនអាចយកអំពើបុណ្យមកលុបលាងបានទេ ព្រោះបុណ្យ និងបាបឱ្យផលខុសគ្នា ។ ដូច្នេះរឿងស្រង់ទឹកមាតាបិតានេះ គឺបានបុណ្យច្រើនណាស់ព្រោះបង្ហាញពីអត្ថន័យឱ្យតម្លៃពីគុណរបស់ឪពុកម្តាយដែលបានផ្តល់កំណើតដល់កូនប្រុសស្រី ។

**•ពេលចូលឆ្នាំខ្មែរម្តងៗគេឃើញមានពុទ្ធបរិស័ទនាំគ្នាយកបាយសម្លទេយ្យទានទៅប្រគេនព្រះសង្ឃមានខ្លះបង្សុកូលជាដើម តើធ្វើដើម្បីអ្វី ?**

-គេធ្វើឧទ្ទិសដល់ញាតិ ព្រោះឱ្យតែដល់ពិធីបុណ្យចូលឆ្នាំថ្មីនេះ គេតែងរលឹកដល់ពពួកញាតិ ដូនតាដែលបានលាចាកលោកនេះ ហើយមានតែបុណ្យទក្ខិណានុប្បទានទេដែលអាចឱ្យដល់អ្នកស្លាប់ ។ ដើម្បីឱ្យបានកុសលទៅដល់អ្នកចែកឋានទៅមានការឧទ្ទិសទានឱ្យអ្នកមានសីល ដូចជាព្រះសង្ឃបន្ទាប់ពីលោកសូត្រធម៌ហើយ គឺយើងទទួលយកមកដោយខ្លួនយើងជាអ្នកឧទ្ទិសដល់ឈ្មោះអ្នកដែលបានស្លាប់ទៅ ។

**•តើអ្នកស្លាប់ទៅមានព្រលឹងដែរទេ ហើយព្រលឹងទៅណានិងមានប្រេតនរកមែនទេ?**

-ក្នុងព្រះពុទ្ធសាសនាលោកមិនហៅថាព្រលឹងទេ ។ ព្រលឹងគឺសំដៅដល់អត្ថន័យមួយដែលហោះទៅតាមមែកឈើដើមឈើលើដំបូលផ្ទះ ។ តែចំពោះវិញ្ញាណវិញ គឺវាអាស្រ័យទៅលើរូប បើគ្មានរូបទេក៏គ្មានវិញ្ញាណដែរ គឺវារលត់ខណ្ឌទាំង៥ដែលមានរូបក្ខន្ធវេទនាក្ខន្ធសញ្ញាខន្ធ សង្ខារក្ខន្ធ និងវិញ្ញាណក្ខន្ធ ដូច្នេះបើបែកធ្លាយខន្ធទាំង៥នេះហើយ វិញ្ញាណក៏គ្មានស្ថិតនៅដែរ ។ មនុស្សស្លាប់ភ្លាមវិញ្ញាណក៏ចេញទៅចាប់កំណើតភ្លាម ហើយបើមនុស្សនោះកាលនៅរស់ធ្វើបុណ្យច្រើនក៏ទៅចាប់កំណើតជាមួយនឹងស្ត្រីណាដែលកំពុងតាំងគភ៌ភ្លាម ។ តែបើអ្នកមានបាបពេលស្លាប់ទៅវិញ្ញាណក៏ទៅចាប់ភព នឹងប្រេត ឬសត្វទៅតាមផលកម្មដែលបានសាង ។ រីឯប្រេតនរកនោះ គឺមានមែន ។

**•គេថាមានយមរាជ តើមានមែនដែរទេ? ជាអ្វី ?**

-តាមពិតទៅយមរាជមានពិតប្រាកដ មែន ហើយយមរាជនេះគេសំដៅលើអ្នកគ្រប់គ្រងនៅឋាននរក ដែលមានទ្វារមានរណ្តៅទាំង៨រណ្តៅមានខ្ទះដែក មានរការដែក មានសត្វតិរច្ឆានជាដើម ។ យមរាជនេះជាស្តេចរបស់ពួកសត្វនរកដែលកាលពីនៅរស់ធ្លាប់ធ្វើជាមេការកាប់សម្លាប់គេ ហើយស្តេចនេះក៏ជាប្រភេទទេវតាដែលពេលខ្លះក៏សោយទុក្ខ និងពេលខ្លះក៏សោយសុខ ។

**•អ្នកស្លាប់ទៅសូន្យឈឹងគ្មានព្រលឹងវិញ្ញាណ តែហេតុដូចម្តេចកូនចៅធ្វើចេតិយឱ្យ តើធ្វើដើម្បីអ្វី ?**

-តាមពិតទៅការធ្វើចេតិយឱ្យមនុស្សស្លាប់ទៅនេះ គឺគ្រាន់តែចង់រំលឹកគុណបុណ្យដល់គាត់ ដែលគាត់មិនត្រឹមតែបានបង្កើតកូនចៅទេ តែថែមទាំងបានរកស៊ីចិញ្ចឹមបីបាច់កូនចៅដោយក្តីមេត្តាករុណាបំផុត កាលពីគាត់នៅរស់ គឺគាត់ធ្វើគ្រប់បែបយ៉ាងដើម្បីឱ្យកូនបានរស់ ។ លុះពេលគាត់ស្លាប់ទៅ គឺទៅតាមយថាកម្មរបស់គាត់ ត្រង់ថាព្រលឹងវិញ្ញាណគាត់នៅនឹង ចេតិយនោះគេមិនដឹងទេ ។

**•រាល់អ្នកធ្វើបុណ្យម្តងៗមិនថាចូលឆ្នាំអីទេ តើអ្នកនោះទទួលបានអានិសង្សកម្រិតណាដែរ?**

-បើនិយាយពីផលបុណ្យវិញ គឺវាអាស្រ័យទៅតាមពិធីដែលគេបានធ្វើប្រកបដោយបញ្ញាឬក៏អត់ ហើយគេធ្វើបុណ្យចំពោះភិក្ខុសង្ឃនោះ តើមានសីលឬអត់ ។ តែបុណ្យកុសលដែលបានច្រើនបានតិចនោះ គឺវាអាស្រ័យទៅលើសេចក្តីជ្រះថ្លារៀងៗខ្លួន ។ បើជ្រះថ្លាខ្លាំងក៏បានបុណ្យច្រើនទៅ ហើយទេយ្យទានដែលបានមកនោះប្រកបដោយធម៌ដែរឬទេ? បើបានមកប្រកបដោយធម៌ត្រង់នេះបញ្ជាក់ថា បានបុណ្យបានអានិសង្សច្រើន តែបើរបស់បានមកដោយលួចឆក់ប្លន់គេទេ ពេលយកមកធ្វើបុណ្យទានបានបុណ្យដែរ តែផលអាក្រក់នោះនាំឱ្យអ្នកប្រព្រឹត្តវិនាសអន្តរាយទ្រព្យធនទៅវិញតាមកម្មរបស់ខ្លួនបានសាង ៕



តមកទំព័រទី ១៥

## ស្លាប់គ្រូចិនសែទស្សន៍ទាយជំនឿ...

ដែលមានរបររកស៊ីលក់ដូរមាស និងឈើ ។ ជាពិសេសចំពោះអ្នកដែលកើតឆ្នាំច ឆ្នាំរោង និងឆ្នាំឆ្លូវត្រូវមានការប្រុងប្រយ័ត្ននូវការខាតបង់ និងចោរកម្ម លួចប្លន់ នៅក្នុងខែមេសា ខែតុលា និងខែវិច្ឆិកា ។ ជាមួយគ្នានោះដែរ អ្នកដែលកើតឆ្នាំរោងកាលពីក្នុងឆ្នាំ១៩៦៤ ត្រូវប្រុងប្រយ័ត្នធ្វើអ្វីមួយត្រូវតែគិតគូរពិនិត្យពិច័យឱ្យបានល្អិតល្អន់ ព្រោះអាចនឹងកើតមានការខាតបង់ទ្រព្យធន គ្រោះថ្នាក់ដល់សាច់ញាតិ និងខ្លួនឯងថែមទៀតផង ។ ចំណែកឯមនុស្សប្រុសស្រីណាដែលកើតក្នុងឆ្នាំជូតត្រូវមានការប្រុងប្រយ័ត្នខ្ពស់ក្នុងការធ្វើដំណើរ ព្រោះតាមទំនាយអ្នកកើតឆ្នាំជូតគឺនៅក្នុងឆ្នាំរោងនេះនឹងជួបនូវគ្រោះថ្នាក់ចរាចរណ៍ច្រើន ហើយគ្រោះថ្នាក់នេះទៀតសោតភាគច្រើនបណ្តាលឱ្យបាត់បង់ជីវិត ហើយច្រើនកើតឡើងនៅវេលាម៉ោង១១ថ្ងៃត្រង់ និងម៉ោង៣រសៀល ។

លោកគ្រូ ចាំង ចាំងឡុង បានបញ្ជាក់ថាឆ្នាំរោងនេះនឹងកើតមានគ្រោះថ្នាក់ចរាចរណ៍ច្រើន ដូច្នេះសូមឱ្យបើកបរត្រូវមានការប្រុងប្រយ័ត្ន គោរពច្បាប់ចរាចរណ៍ និងយោគយល់ គ្នា មិនត្រូវបើកបរហួសល្បឿនកំណត់ និងមិនត្រូវផ្ទុកលើសទម្ងន់នោះឡើយ ។ ជាពិសេសរថយន្តតាក់ស៊ី សូមកុំផ្ទុកអីវ៉ាន់សំពីងសំពោង និងដាក់អ្នកដំណើរលើដំបូល ពិសេសក្នុងឱកាសបុណ្យចូលឆ្នាំខ្មែរនេះតែម្តង ។ ប៉ុន្តែទោះជាយ៉ាងដូច្នោះក្តី ក្នុងឆ្នាំរោងនេះនឹងកើតមានរឿងល្អៗច្រើនជាងរឿងអាក្រក់ ៕

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា សឺន សាន



**ដោយ : ម៉ម យីន**

**ទី៣**-ជួយដល់អង្គការក្រៅរដ្ឋាភិបាលសំខាន់នានាឱ្យចូលទៅជួយត្រួតពិនិត្យ និងពន្យល់ណែនាំ ដល់មេដឹកនាំ និងមន្ត្រីគ្រប់ជាន់ថ្នាក់ឱ្យខិតខំប្រឹងប្រែងបំរើកិច្ចការងារប្រទេសជាតិឱ្យបានល្អប្រសើរ ចៀសវាងការប្រព្រឹត្តអំពើពុំគប្បីផ្សេងៗដូចជាអំពើទុច្ចរិត ពុករលួយ អំពើរំលោភលើសិទ្ធិសេរីភាពរបស់ប្រជាពលរដ្ឋជាដើម ។

**ទី៤**- ជួយផ្តល់ការសិក្សារៀនសូត្រ អប់រំដល់មន្ត្រី និងប្រជាពលរដ្ឋទាំងអស់ឱ្យបានចេះដឹងយល់ច្បាស់អំពីលទ្ធិប្រជាធិបតេយ្យ គឺកើតចេញមកពីប្រជាពលរដ្ឋ សម្រាប់ប្រជាពលរដ្ឋ និងដើម្បីប្រជាពលរដ្ឋ ដោយពុំត្រូវយករបបគ្រប់គ្រងផ្តាច់ការមកប្រើឡើយនាសម័យនេះ ។ ពីព្រោះលទ្ធិប្រជាធិបតេយ្យ គឺកើតចេញមកពីចេតនារម្មណ៍ដ៏ល្អប្រពៃរបស់មេដឹកនាំ និងមន្ត្រីគ្រប់ជាន់ថ្នាក់ បើសិនណាជាមេដឹកនាំ និងមន្ត្រីពេញចិត្តចង់ឱ្យមាន គឺវាប្រាដកជាកើតមានជាពិតប្រាកដ ។

ទោះបីអង្គការអន្តរជាតិបានខិតខំជួយដោះស្រាយបញ្ហាធំៗជាច្រើនលើកច្រើនគ្រាយ៉ាងណាក៏ដោយ ក៏ការគ្រប់គ្រងដឹកនាំនៅក្នុងប្រទេសខ្មែរ ចាប់តាំងពីថ្ងៃ៧មករា ១៩៧៩ មកនោះ ពុំបានសមស្របទៅគោលបំណង និងផែនការរបស់អង្គការសហប្រជាជាតិទាំងស្រុងដែរ ។ ពីព្រោះក្រុមដឹកនាំដែលកើតចេញមកពីប្រទេសសង្គមនិយមយួននោះ នៅតែជាអ្នកកាន់អំណាចពេញទំហឹងរៀងរហូតមក ដូច្នេះការអនុវត្តន៍លទ្ធិប្រជាធិបតេយ្យមានត្រឹមតែការថ្លែងរបស់មេដឹកនាំខ្មែរនិយមយួនតែប៉ុណ្ណោះ ហើយនិងអនុវត្តបានតែនៅក្នុងករណីណាដែលជាកិច្ចការតូចតាច ចំណែកកិច្ចការណាដែលផ្តល់អត្ថប្រយោជន៍ និងគុណប្រយោជន៍ដ៏ធំមហាសាលសម្រាប់ប្រទេស និងប្រជាជាតិខ្មែរពិតប្រាដកនោះ មេដឹកនាំពុំព្រមផ្តល់លទ្ធិសេរីភាពទូលំទូលាយសមរម្យ ដល់សកម្មជនស្នេហាជាតិបានចូលរួមជួយដោះស្រាយទេ មានន័យថា មេដឹកនាំបានអនុវត្តរបបគ្រប់គ្រងផ្តាច់ការយ៉ាងព្រៃផ្សៃកាចសាហាវបំផុត ដែលផ្ទុយស្រឡះពីលទ្ធិប្រជាធិបតេយ្យពិតប្រាដក ។

សរុបសេចក្តីទៅ បើកាលណាចង់ឱ្យការអនុវត្តគោលការណ៍លទ្ធិប្រជាធិតេយ្យបានល្អប្រសើរលុះត្រាតែមានការភ្ញាក់រលឹក ការចេះដឹង ហើយយល់ច្បាស់ពីប្រជាពលរដ្ឋខ្មែរទូទៅដែលជាអ្នកម្ចាស់ប្រទេស និងជាម្ចាស់សន្លឹកឆ្នោតជ្រើសរើសមេដឹកនាំ និងតំណាងរាស្ត្ររដ្ឋសភាជាតិ មានឆន្ទៈអង់អាចក្លាហានព្រមធ្វើការផ្លាស់ប្តូរចេញនូវមេដឹកនាំប្រកាន់របបផ្តាច់ការ ហើយជ្រើសរើសយកមេដឹកនាំ ដែលប្រកាន់លទ្ធិប្រជាធិបតេយ្យពិតប្រាកដមកដឹកនាំ គ្រប់គ្រងប្រទេសជាតិវិញឱ្យបានដូចប្រទេសនានា ដែលស្រលាញ់លទ្ធិប្រជាធិបតេយ្យនោះដែរ ។

**ភាគ៩ ប្រវត្តិសង្ខេបរណសិរ្សរំដោះប្រជាពលរដ្ឋខ្មែរ**

រណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែររ.ជ.រ.ប.ខ បានកកើតឡើងមុនដំបូងមានកងទ័ពប្រមាណពីពាន់នាក់(២000នាក់)ដោយមានលោកតា សឺន សាន ជាប្រធានព្រមទាំងមានអស់លោកវរជន ព្រឹទ្ធាចារ្យសំខាន់ៗដែលធ្លាប់កាន់តំណែងក្នុងរដ្ឋាភិបាលពីមុនមកតាំងតែពីសម័យអាណានិគមនិយមបារាំង និងធ្លាប់ធ្វើជាមេដឹកនាំគណបក្សនយោបាយ ដូចជាគណបក្សប្រជាធិបតេយ្យមានលោកសម្តេច ប៉ែន នុត លោក ស៊ឹម វ៉ា លោក ថុន អ៊ុត លោក កែ ណុល លោកឧត្តមសេនីយ៍ សក់ ស៊ុតសាខន លោក ឧត្តមសេនីយ៍ ដៀន ដែល លោក-នាង ជិនហន ជាដើម និងអស់លោកជាបញ្ញាវ័ន្តសំខាន់ៗមួយចំនួនទៀត ដូចជាលោកបណ្ឌិត ហ៊ីង គុនថុន លោកបណ្ឌិត ពាង ម៉េត ហ្គាហ្វា លោក ប៊ុន សយ លោក ប៉ែន ថុល្លា លោក ប៉ែក ញ៉ាច (លោកទាំងបីនាក់ជាបុត្រសម្តេច ប៉ែន នុត) លោក វ៉ាន់ ស ជាដើម ព្រមទាំងមានអស់លោកជាអតីតនាយកទាហានជាន់ខ្ពស់នៃកងទ័ពជាតិជាច្រើនរូបទៀតបានចូលរួមផង មានរូបខ្ញុំបាទដែលជាអតីតសាស្ត្រាចារ្យបច្ចេកទេស និងជាអតីតវរៈសេនីយទោនៃកងឯកភាពទាហានជាងកងទ័ពជាតិខ្មែរផងដែរ ។



-តើការបង្កើតរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរមានអក្សរកាត់ថា រ.ជ.រ.ប.ខ ផ្តើមមានឡើងដោយរបៀបណា?

ការភ្ញាក់រលឹកការឈឺចាប់ និងការស្រលាញ់ដល់ប្រទេសជាតិមាតុភូមិ ជាពិសេសជាតិពូជសាសន៍ខ្មែរ ដែលឃើញប្រទេសជិតខាងប្រើល្បិចកលតាមគម្រោងផែនការរបស់គេដើម្បីសម្លាប់ពូជជាតិសាសន៍ខ្មែរ និងលេបប្រទេសជាតិឱ្យទៅនៅក្រោមការត្រួតត្រារបស់គេ ដូចមានប្រវត្តិសាស្ត្រខ្មែរបានចរិតទុកមករាប់ពាន់ឆ្នាំមកហើយ តាំងពីសម័យក្រោយអង្គរមក ទើបបណ្តាលឱ្យចលនាស្នេហាជាតិមាតុភូមិមួយចំនួន បានរួបរួមសាមគ្គីគ្នានៅក្នុងព្រៃ ចាប់តាំងពីខេត្តកោះកុងលើខ្នងភ្នំបន្ទាត់ជួរភ្នំក្រវ៉ាញជិតតំបន់ប៉ៃលិន ខេត្តបាត់ដំបង ។

ចលនានេះបានឱ្យឈ្មោះថា ចលនាសេរីភាពកន្ទ្បែងស (**មានតនៅលេខក្រោយ**)




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : គឹម វិមល**

**៣១ កក្កដា ៩២ :** ក្នុងបទសម្ភាសន៍មួយផ្តល់ឱ្យ ណាយន់ ចិន្តា នៃទស្សនាវដ្តី Fra Eastern Economic Review សម្តេចសីហនុមានព្រះបន្ទូលថា "ពួកខ្មែរក្រហមពុំមានការរសើប និងការដាក់ទណ្ឌកម្មណាមួយលើពួកគេនោះទេ ហើយនៅតែបន្តយុទ្ធសាស្ត្រពន្យឺតពេលដំណើរការអ៊ុនតាក់ នៅគ្រប់ពេលដែលអ៊ុនតាក់តបតនឹងការរំលោភរបស់ពួកគេ"។

**៣ សីហា ៩២ :** ប្រទេសថៃប្រកែកមិនហាមប្រាមដល់សហគ្រាសន៍ថៃដែលរកស៊ីជាមួយខ្មែរក្រហម -ជំនួបថៃ -ចិន ព្រមព្រាងពង្រឹងជំហរ CNS ដោយឱ្យមានរដ្ឋបាលផ្ទាល់មួយ ។ ជំនួប ខៀវ សំផន ជាមួយ ស៊ូ ឌុកស៊ិន អនុរដ្ឋមន្ត្រីការបរទេសចិន និងនាយកការិយាល័យក្រសួងការបរទេសថៃ។

**៤ សីហា :** ស៊ូ ឌុកស៊ិន ជួបជាមួយ ប៉ុល ពត នឹងមេដឹកនាំខ្មែរក្រហមឯទៀតដើម្បីនាំសេចក្តីព្រមព្រាងថៃ-ចិន មកប្រាប់ ហើយស្នើឱ្យខ្មែរក្រហមបន្ទន់តំរិយាបថ -នៅទីបញ្ចប់ខ្មែរក្រហមនៅតែទាមទារឱ្យរំលាយរដ្ឋកម្ពុជា និងកែប្រែ CNS ឱ្យទៅរដ្ឋាភិបាលពេញលេញ ដែលការទាមទារនេះខុសនឹងស្មារតីនៃកិច្ចព្រមព្រាងប៉ារីស។

**៥ សីហា :** ប្រជុំ CNS នៅសៀមរាប -ច្បាប់បោះឆ្នោតបានត្រូវអនុម័ត ដោយលោក អាកាស៊ុ បើទោះជាខ្មែរក្រហមប្រឆាំងក៏ដោយ។

**១៧ សីហា :** ផ្តើមចុះឈ្មោះបណ្តោះអាសន្ន សម្រាប់គណបក្សនយោបាយ។

**២០ សីហា :** ឧត្តមសេនីយ៍ សាន់ ឌីសុន មានការជាក់ច្បាស់ថា ខ្មែរក្រហមនឹងអនុវត្តន៍តាមកិច្ចព្រមព្រាងដើម្បីសន្តិភាព។

**២១ សីហា :** អ៊ុនតាក់ ផ្តើមពិនិត្យអត្តសញ្ញាណសញ្ជាតិ និងដើមកំណើតនៃមន្ត្រីរដ្ឋបាលរដ្ឋកម្ពុជា។

**២២ សីហា :** សំណើ ជប៉ុន-ថៃ ឱ្យបង្កើតរដ្ឋបាល សម្រាប់ពិគ្រោះមួយរបស់ CNS បញ្ជូនឱ្យ ខៀវ សំផន ពិនិត្យ តែមិនបានទាត់ចោលទេ។

**២៣ សីហា :** កិច្ចប្រជុំ CNS តំណាងរដ្ឋកម្ពុជា ស្នើឱ្យមានការបោះឆ្នោតឱ្យបានឆាប់ ឱ្យមានប្រធានាធិបតីសម្រាប់គ្រប់គ្រងជាតិមួយ។

**២៧ សីហា :** នៅបាងកក ជួបពិភាក្សាជាមួយ ខៀវ សំផន សាជាថ្មីពីករណីសំណើរ ជប៉ុន -ថៃ ដែលនឹងនាំឱ្យមានការចូលរួមត្រួតពិនិត្យរបស់ក្រុមខ្មែរក្រហម លើរដ្ឋបាលបច្ចុប្បន្ន ដឹកនាំដោយរដ្ឋកម្ពុជា។

**២៨ សីហា :** ជនភៀសខ្លួន ១០ម៉ឺននាក់ ធ្វើមាតុភូមិនិវត្តន៍។

**៤កញ្ញា ១៩៩២ :** ក្រុមរដ្ឋមន្ត្រីការបរទេសអាស៊ាន ក្នុងកិច្ចប្រជុំនៅ យ៉ាកាតា បានប្រឆាំងនឹងការរៀបចំការបោះឆ្នោតដោយខ្មែរក្រហម

**២០កញ្ញា :** អ្នកសង្កេតការណ៍៨នាក់របស់ជប៉ុនមកដល់មុននឹងកងទ័ព១៨០០នាក់របស់ប្រទេសជប៉ុនមកដល់កម្ពុជា គឺជាកងកម្លាំងជប៉ុនដំបូងបង្អស់ដែលបានបញ្ជូនចេញក្រៅប្រទេសគិតចាប់តាំងពីឆ្នាំ១៩៤៥ មក

**២២កញ្ញា :** ក្រុមប្រឹក្សាជាតិជាន់ខ្ពស់ CNS សម្រេចហាមប្រាមការនាំឈើចេញក្រៅប្រទេសពីថ្ងៃ ៣១ ធ្នូតទៅ -លោកក៏បានសម្រេចឱ្យអ៊ុនតាក់ចាប់ផ្តើមកាន់កាប់ធានាគារជាតិនៃរដ្ឋកម្ពុជា -លោកសម្រេចផងដែរ ថាគោរពកិច្ចព្រមព្រៀងអន្តរជាតិទាំងចេះ៥ចំណុចស្តីពីសិទ្ធមនុស្ស និងសិទ្ធិជាមូលដ្ឋាន ។

**២៣កញ្ញា :** អនុរដ្ឋមន្ត្រីការបរទេសចិន ស៊ុយវ៉ាន់ស៊ិនបានប្រកាសនៅភ្នំពេញថា ចិនគាំទ្រឱ្យមានការបោះឆ្នោតចំពោះ ដើម្បីជ្រើសរើសប្រមុខរដ្ឋកម្ពុជា ។

**២តុលា ១៩៩២ :** បិតជំរុំសាយខេ (របស់ខ្មែរក្រហម)នឹងជំរុំសុខសាន្ត (ក្រុម FNLPK)

**៣តុលា :** ឃាតកម្មលើអ្នកនេសាទវៀតណាម១១នាក់ដោយក្រុមខ្មែរក្រហមនៅចំការលើ ឃុំបុទុមសាគរ ខេត្តកោះកុង ។

**៤តុលា :** ចាប់ជម្លៀសក្រុមនិគមយួន ៨នាក់នៅកុមសារត្រៀម ឃុំប្រាសាទបាឡាំង ខេត្តកំពង់ធំ គេពុំបានឃើញអ្នកទាំង៨នាក់ត្រឡប់មកវិញទេ

**៥តុលា :** ផ្តើមចុះឈ្មោះបោះឆ្នោត

**១៣ តុលា :** ក្រុមប្រឹក្សាសន្តិសុខផ្តល់នូវការពិគ្រោះជាបន្តរហូតដល់ថ្ងៃ១៥ វិច្ឆិកា ដើម្បីបញ្ចប់ -កំណត់ថ្ងៃបោះឆ្នោតនៅខែ ឧសភា ឆ្នាំ ១៩៩៣ ហើយសម្តែងការខកចិត្តពីក្រុមខ្មែរក្រហម -ខ្មែរក្រហមបំផ្ទុះផ្តាច់ស្ពានសំខាន់២ដែលភ្ជាប់ទៅនឹងតំបន់ខាងកើត

**១៩តុលា :** បិតជំរុំអុរត្រាវ (ក្រុមខ្មែរក្រហម)

**២០តុលា :** ប្រជុំក្រុមប្រឹក្សាសន្តិសុខពុំបានធ្វើសេចក្តីសម្រេចរៀបចំបោះឆ្នោតជ្រើសរើសប្រធានាធិបតីសម្តេចសីហនុប្រកាសប្រកែកមិនព្រមទទួលតំណែងជាប្រធានាធិបតី ។ ព្រះអង្គយល់ថា CNS គឺជាកន្លែងដែលត្រូវមកចរចារគ្នា ហើយសោកស្តាយចំពោះការលូកដៃរបស់ជប៉ុន និងថៃ ។ ខៀវ សំផន ថ្លែងថា ការបោះឆ្នោតដោយអ៊ុនតាក់ និងធ្វើឱ្យកម្ពុជាក្លាយជារណបរបស់យួន ។

**មានតនៅលេខក្រោយ**




# ពុទ្ធប្បវត្តិអមដោយរូបភាព

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.

**១៩០**-នៅក្នុងគិម្ហន្តរដូវ បើព្រះបរមគ្រូទ្រង់គង់នៅកន្លែងណាមួយ ប្រជាជនទាំងឡាយដែលនៅស្រុកភូមិក្បែរនោះ តែងតែនាំគ្នាទៅថ្វាយបង្គំគាល់ព្រះអង្គក្នុងពេលល្ងាច ។ អ្នកខ្លះមានទេយ្យវត្ថុសំរាប់ថ្វាយប្រគេនព្រះអង្គ. ខ្លះទៀតមកដើម្បីស្តាប់ធម្មទេសនា ។ ដោយមានមធ្យោបាយផ្សេងៗជាច្រើន និងការចេះប្រើសំដីភាសាដ៏ប៉ិនប្រសប់អស្ចារ្យគួរឱ្យស្ញប់ស្ញែង ព្រះដ៏ទ្រង់ញាណតែងតែធ្វើឱ្យមហាជនទាំងឡាយបានយល់នូវធម៌ដែលព្រះអង្គបានសំដែងហើយ ។ ជនទាំងឡាយទោះជាអ្នកមាន អ្នកក្រ អ្នកមានប្រាជ្ញា ឬឥតមានប្រាជ្ញាក្តី ក៏ដឹងបានថា ព្រះអង្គសំដែងធម៌ដល់ខ្លួនគេដែរ ។ ហេតុដូច្នោះ ក្រោយពីបានស្តាប់ធម្មទេសនាចប់ ជនទាំងឡាយនោះ មានចិត្តសប្បាយរីករាយ និងពេញចិត្ត បានបង្ហាញឱ្យឃើញនៅចំពោះព្រះភ័ក្ត្រព្រះអង្គថា ពួកគេមានជំនឿទុកចិត្តលើព្រះពុទ្ធ ព្រះធម៌ហើយៗ គេនឹងគោរពប្រតិបត្តិតាមដ៏ហ្មត់ចត់អស់មួយជីវិត។



**190**-In summertime, if the Buddha stayed at certain places, the people in the neighborhood would come to visit him in the evening. Some came with offerings; some came to listen to his preaching. By various means and using skillful and marvelous language, the Buddha always made everyone understand what he said. Everybody whether rich, poor, learned or ignorant-felt that the Buddha had expounded the dharma for him. Thus, after the sermon, everybody was happy and satisfied and showed before the Buddha that he had confidence in the Buddha-dharma and would put it strictly and reverently into pracice throughout his lifetime.

**១៩១**-កាលបើបរិស័ទទាំងឡាយចាកចេញទៅផ្ទះអស់ហើយ ព្រះពុទ្ធជាម្ចាស់ទ្រង់ក៏យាងត្រឡប់ទៅវត្តវិញដើម្បីស្រង់ទឹក តែប្រសិនបើមានស្រះទឹក ឬស្ទឹងដ៏សមគួរនៅក្បែរព្រះអង្គទ្រង់ស្រង់ទឹកនៅទីនោះនាវេលាល្ងាចតែម្តង ។ បន្ទាប់មក ព្រះអង្គទ្រង់ធ្វើសមាធិមួយរយៈពេលខ្លី រួចហើយគង់ចាំទទួលភិក្ខុទាំងឡាយដែលនិមន្តមកពីតំបន់ផ្សេងៗបន្តទៀត ។ ព្រះពុទ្ធទ្រង់សួរភិក្ខុទាំងឡាយថា បានរៀនអ្វីខ្លះហើយ រួចទ្រង់ក៏បង្រៀនភិក្ខុទាំងឡាយនោះ ព្រមទាំងពន្យល់នូវធម៌ដែលលំបាលនឹងយល់ ឱ្យយល់បានដោយងាយ បន្ទាប់មកភិក្ខុទាំងអស់និមន្តចេញទៅពោរពេញដោយសេចក្តីសប្បាយរីករាយ។



**191**-After the people had left, the Buddha returned to the monastery to bathe, but if there was a suitable river or pond in the vicinity, he might take a bath there in the evening. After his bath, the Buddha would enter into Samadhi to rest for some time and then continue to receive bhikkhus coming from other places. The Buddha would inquire about how they were tought and instruct them and explain to them the Buddha-dharma, which was difficult to understand, bringing them to understand it and leave afterwards full of joy.

**១៩២**-ដោយមានការនឿយហត់ក្រោយពីការគង់ពេញមួយថ្ងៃមក. ក្នុងវេលាព្រលប់ព្រះពុទ្ធជាម្ចាស់ទ្រង់និមន្តចង្ក្រមដើម្បីលំហែព្រះកាយ ។ ព្រះអង្គទ្រង់យាងចង្ក្រមទៅមកៗក្នុងវត្ត ដើម្បីបន្ធូរបន្ថយការនឿយហត់អស់កំលាំង និងទទួលយកនូវភាពស្រស់ស្រាយនៃខ្យល់បរិសុទ្ធឡើងវិញ ។ រៀងរាល់ល្ងាច បន្ទាប់ពីទ្រង់យាងចង្ក្រមរួចហើយ ព្រះពុទ្ធជាម្ចាស់ទ្រង់សំដែងធម៌ដល់ភិក្ខុទាំងឡាយជាបន្ត ។ វេលាយប់បន្តិចទៅ មានមនុស្សសំខាន់ៗដូចជា ព្រះមហាក្សត្រជាដើម ទ្រង់យាងជួបនឹងព្រះពុទ្ធជាម្ចាស់ និងទ្រង់ទូលសួរអំពីបញ្ហាផ្សេងៗ ហើយព្រះអង្គទ្រង់តែងឆ្លើយបំភ្លឺនូវបញ្ហាទាំងឡាយនោះៗ បន្ទាប់មក ព្រះរាជាទ្រង់យាងត្រឡប់ទៅបរមរាជវាំងវិញដោយព្រះទ័យសោមនស្សរីករាយបំផុត។



**192**-Being tired after sitting all day, the Buddha took his "promenade" at the dusk time. He walked back and forth in one place within the monastery to get rid of his fatigue and to regain his freshness. Every evening, after his promenade, the Buddha would talk again with the bhiksus. Late at night important persons, such as knigs might come to visit the Buddha and inquire about certain problems; and the Buddha used to answer their questions and they took leave afterwards full of joy.

**១៩៣**-បន្ទាប់មកទៀត ក៏ដល់ពេលដែលព្រះអង្គទ្រង់ចូលផ្ទំ ។ ព្រះពុទ្ធបរមគ្រូទ្រង់ផ្ទំផ្អៀងបែរមកខាងស្តាំ ព្រះបាទាទាំងគូរទ្រង់អង្កុញបន្តិច. ព្រះបាទឆ្វេងទ្រង់ផ្តួងដាក់លើព្រះបាទស្តាំ. ព្រះហស្តឆ្វេងទ្រង់ដាក់លើភ្លៅឆ្វេង និងព្រះហស្តស្តាំទ្រង់ដាក់ទ្រថ្ពាល់ស្តាំ ។ ព្រះពុទ្ធអង្គទ្រង់ផ្ទំក្នុងវេលាដ៏សមគួរមួយ និងទ្រង់តើនឡើងវិញមុនវេលាអរុណរះ ។ ពេលនោះ. ព្រះអង្គទ្រង់គង់ចំរើនសមាធិ ដើម្បីប្រមើលមើលឧបនិស្ស័យនៃមនុស្ស សត្វទាំងឡាយ សំរាប់ប្រោសនៅពេលថ្ងៃស្អែក ហើយក្រោយវេលាអរុណរះ ព្រះអង្គទ្រង់ផ្សព្វផ្សាយព្រះធម៌បន្តទៀត។



**193**-After that it was time to go to sleep. The Buddha slept on his right side dwon, his two legs slightly bent, the left one on the right one; his left hand was placed on his left thigh, and his right hand was bent back placed under his right cheek. The Buddha went quietly to sleep at the proper time and awoke before dawn. Then he entered into Samadhi to explore the natures of his prospective audiences for the day and continued after daybreak to expound the dharma.

(នៅមានតលេខក្រោយ)

(Continued to after Issue)




# ចៀនអាហារប្រឡាក់ម្សៅ ឲ្យស្រួយគួរចង់ទទួលទាន

▸ ជាទូទៅអាហារចៀនដែលលាយឡំឡើងដោយជាតិម្សៅរមែងចៀសមិនផុតពីបញ្ហាស្វិត ឬបើពុំនោះទេ ក៏ជ្រាយមានសភាពមិនគួរឱ្យចង់ទទួលទានទាល់តែ សោះ ។ សួរថា តើមានវិធីបែបណាដើម្បីឱ្យអាហារចៀនលាយម្សៅរបស់អ្នកមានសភាពស្រួយ ដូចអំបុកលីងគួរឱ្យចង់ទទួលទានបំផុតនោះ ?

អាថ៌កំបាំងរបស់វា គឺមុនដំបូងត្រូវលាយម្សៅទុកចោលប្រមាណពី៥-១០នាទី មុននាំយកទៅច្របាច់ ឬបោកឱ្យលាយចូលសាច់មួយ ។ វិធីនេះនឹងធ្វើឱ្យម្សៅរបស់អ្នកមានសភាពស្រួយ ហើយឆ្ងាញ់ពេលចម្អិនហើយ ។

មូលហេតុការធ្វើតាមរូបមន្តខាងនេះនៅពេលអ្នកប្រឡាក់ម្សៅជាមួយអាហារហើយដាក់ចៀនវាទៅក្នុងប្រេងម្សៅនឹងឡើងល្អស្អិតជាមួយសាច់អាហារជាហេតុធ្វើឱ្យម្ហូបស្រួយល្អមិនរឹងស្វិត ។ ក៏ប៉ុន្តែគោងចងចាំទុកថា ប្រសិនបើលាយម្សៅភ្លាមដាក់ចៀនភ្លាមម្សៅ នឹងស្វិតហើយថែមទាំងរឹងទៀតផង ៕



# របៀបថែសក់អ៊ុតមិនឲ្យក្រៀមស្ងួត



▸ ក្រៅពីនិយមតុបតែងកាយដោយសម្លៀកបំពាក់ហើយ ការនិយមតុបតែងសក់ និងផ្ទៃមុខក៏មានសន្ទុះមិនចាញ់គ្នាប៉ុន្មាននោះដែរ ។ ការតុបតែងសក់ដោយអ៊ុតចេញជាម៉ូតប្លែកៗវា ពិតជាជួយកែទម្រង់ផ្ទៃមុខរបស់អ្នកឱ្យកាន់តែស្រស់បំព្រង ។

ស្ថិតក្នុងស្ថានភាពបែបនេះ ប្រសិនបើមើលថែទាំមិនបានត្រឹមត្រូវតាមវិធីនោះ អាចធ្វើឱ្យសរសៃសក់ដ៏ស្រស់ស្អាតរបស់អ្នកក្លាយទៅជាក្រៀមស្ងួតងាយបែកចុងក្លាយទៅជាអំបោសបោសផ្ទះបាន ។

ចំពោះវិធីថែទាំសក់ក្រោយពេលអ៊ុតសក់រួចអ្នកគួររក្សាទុកវាពី៣-៤ថ្ងៃ ដើម្បីជាតិថ្នាំជ្រាបចាប់បានល្អ ។ នៅពេលកក់សក់គួរជ្រើសរើស សាប៊ូ និងឡេលាបសក់ដែលកំណត់ទុកឱ្យប្រើចំពោះតែសក់អ៊ុតប៉ុណ្ណោះ ។

ក្រៅពីនេះនៅពេលសិតសក់ គួរប្រើក្រាសដែលមានធ្មេញរង្វើលៗ និងក្រោយពេលកក់សក់រួចត្រូវប្រញាប់ជូតសក់ឱ្យស្ងួតឆាប់បំផុត ព្រោះសំណើមវាធ្វើឱ្យសរសៃសក់ឆាប់រលាលឿនបំផុត មិនគួរប្រើផលិតផលថែទាំសរសៃសក់ ក្រោយពេលអ៊ុតហើយជានិច្ច ។ កត្តាសំខាន់ គឺក្រោយពេលអ៊ុតសក់រួចអ្នកគួររក្សាទុក៣-៤ថ្ងៃ ដើម្បីឱ្យជាតិថ្នាំជ្រាបចាប់បានល្អជាមុនសិន ។ ប្រសិនបើព្យាយាមធ្វើបែបនេះបាន មិនត្រឹមតែជួយឱ្យសរសៃសក់ទន់ល្អប៉ុណ្ណោះទេ វាថែមទាំងជួយរក្សាទម្រង់សក់អ៊ុតជាប់បានយូរទៀតផង ៕



# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំថោះ



ជោគជតាប្រចាំសប្តាហ៍




រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកជាមនុស្សពូកែខាងសម្ដីវោហារ ហើយបើបានធ្វើជាមេគេនិងទោះជាបាននិយាយស្ដីច្រើនបន្តិចក្ដីក៏មិនឥតប្រយោជន៍ដែរ ព្រោះត្រូវបានកូនចៅនៅក្រោមស្ដាប់បង្គាប់ បញ្ហាឥតហ៊ានងាករេទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈ ពេលនេះប្រកបដោយភាពផ្អែមល្ហែមដូចទឹកឃ្មុំ ៕




រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ី ជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងផែនការជាមុនទើបពុំមានការថ្លោះធ្លោយ ។ ក្រៅពីនោះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឲ្យបានត្រជាក់ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ច្រើនពាក់មុខយក្សដាក់គ្នា ៕




រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ អ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ។ ដូច្នេះបើលោកអ្នកមាន ទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមដោយមានចុះហត្ថលេខា ឬផ្ដិតស្នាមមេដៃឲ្យបានត្រឹមត្រូវ ទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្ដីសុខក្សេមក្សាន្ត ៕




រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ រាល់ឧបទ្រពចង្រៃ និងរាល់ឧបសគ្គបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នក អាចប្រកបកិច្ចការ-ងារបានពេញដៃពេញជើងតែនៅពេលជាប់មមាញឹកខ្លាំង ចូរប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់នាំឲ្យខាតបង់លាភសក្ការៈ ។ ចំពោះគូស្នេហ៍ក្នុងពេលនេះប្រកបតែសេចក្ដីសុខ ៕




រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ លោកអ្នកអាចរកផលចំណូលបានច្រើនក្រាស់ក្រែលគួរសមក្ដី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្ដោងធំនោះដែរ គឺបានត្រឹមតែចំណាយកម្លាំង និងពេលវេលាឥតអំពើតែប៉ុណ្ណោះ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ៕




រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ី អាចរីបៗបន្តិចឡើងវិញក្ដី តែអ្វីដែលលោកអ្នក គួរប្រយ័ត្នប្រយែងនោះគឺនឹងមានមនុស្សសម្ដីផ្អែមត្រជាក់ មកលួងលោមបំពងបោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរសស្ត្រី គឺមិនត្រូវឆាប់ត្រចៀកទន់ជឿទុកចិត្តគេពេកទេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ប្រកបតែសេចក្ដីសុខ នឹងគ្នា ៕




រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺអាចទទួលបានផលសម្រេចត្រឹមតែពាក់កណ្ដាលប៉ុណ្ណោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានបណ្ដាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំឡើយ ព្រោះកាលបើមានការថ្លោះធ្លោយអាចបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចសព្វមួយដង ៕




រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ី ជួញដូរមានការរីកចម្រើនល្អគួរលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងដើងខ្លាំងយ៉ាងណាក្ដីក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច ។ ចំពោះកម្លោះក្រមុំក្នុងរយៈពេលនេះ អាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕



រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នករត់ចុះរត់ឡើងមានការមមាញឹក និងហត់នឿយច្រើនក្ដី តែភោគផលកម្រៃហូរចូលបានតិចតួចស្ដួចស្ដើងប៉ុណ្ណោះ ។ ដូច្នេះចូរកុំរកបានមកដោយតឹងតែចាយធូរឲ្យសោះ ។ ចំពោះស្នេហាក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទីបីចូលជ្រៀតជ្រែក ៕




រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមការប៉ងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្ដាក់ទុនរកស៊ី ឬចេញទៅជួញដូរផ្លូវឆ្ងាយ គឺសមប្រកបទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបដោយសេចក្ដីសុខក្សេមក្សាន្ត ៕




រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំមានការធ្វេសប្រហែសឲ្យសោះ ជាពិសេសបើមានមនុស្សចម្លែកយករបស់របរមានតម្លៃមកបញ្ចាំ ឬលក់ឲ្យដោយធូរថ្លៃក៏មិនត្រូវទទួល ឬទិញយកដែរប្រយ័ត្នជាន់ដានចោរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ មិនសូវចុះសម្រុងគ្នាប៉ុន្មានទេ ៕




រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្វាមីភរិយាចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕

# លិខិតប្រកាសរកបងប្អូន



ខ្ញុំបាទឈ្មោះ ឈួន គីមសុង រស់នៅក្នុងរដ្ឋ California ។ ខ្ញុំបាទសូមសួរដំណឹងអំពីឈ្មោះ ធឿន ប្រាង (THOEUNG PRANG) ឈ្មោះ ដើម ឡូវ ឡេង (LOV LENG) ដែលធ្លាប់រស់នៅអាស័យ ដ្ឋាន 4933 OLD YORD RD. PHILADELPHIA, PA 19141 ប្រហែលពី១០ឆ្នាំមុន ។

ឈ្មោះ ធឿន ប្រាង ហៅ ឡូវ ឡេង នេះមានបងប្រុសម្នាក់រស់នៅភ្នំពេញសព្វថ្ងៃ ជា ញូង ហៅ ជា ឃួយ Tell. 012 883 073/016 521 349 ។ រីឯបងស្រីពីរនាក់ទៀត ឈ្មោះ ឡូវ ឃាង (LOV KEANG) Tell. 017 618 694 និង ឡូវ ហ៊ាង Tell. 011 720 750 ។

ប្រសិនបើអស់លោកអ្នកបានស្គាល់ឈ្មោះ ធឿន ប្រាង (THOEUN PRANG) ហៅ ឡូវ ឡេង (LOV LENG) នេះ សូមមេត្តាផ្ដល់ ដំណឹងឱ្យខ្ញុំបាទ ឈួន គីមសុង តាមរយៈ ទូរស័ព្ទលេខ (818) 895 1067 ឬ E-mail: kimsongchhuon@gmail.com

ខ្ញុំបាទសូមថ្លែងអំណរគុណដ៏ជ្រាលជ្រៅចំពោះលោកទុកជាមុន !

## ANNOUNCEMENT

My name is Kim Song Chhuon, living in California. I am looking for my relative whose name is THOEUN PRANG. He lived at 4933 Old York Rd. Philadelphia, PA 19141, approximately 10 years ago.

Thoeun Prang has an older brother, Chea Nhuong or Lov, Khouy living in Phnom Penh, Tel 012 883 073 and 016 521 349. Thoeun Prang also has 2 sisters. Her name is Lov, Keang, Tel 017 618 694 and another sister is Lov,Heang, Tel 011 720 750.

I am trying to help them to find their brother, because they lost communications with him.

If anybody knows Thoeun Prang, please tell him to contact me at 818-895 1067 or kimsongchhuon@gmail.com or contact his relatives in Phnom Penh.

Thank you.

# លើករាសីទិសទាំង៨ក្នុងឆ្នាំរោង

**ឆ្នាំរោង ពង្សសត្វនាគ ធាតុទឹក។ ខាងក្រោមនេះជាវិធីលើករាសីបែបជនជាតិចិនតាមទិសទាំង៨ ដើម្បីលើករាសីរបស់លោកអ្នកក្នុងឆ្នាំរោង ។**

- **ទិសបូពិ** (កើត) "ធាតុឈើ"។ ឆ្នាំ នេះតារាដែលចូលមកប្រចាំនៅទិសបូពិ ក៏ជាធាតុឈើដែរ ។ ត្រូវរកវត្ថុដែលមាន រាង៤ជ្រុងជាតំណាងធាតុឈើមកដាក់តាំងលម្អនៅក្នុងគេហដ្ឋាននៅជ្រុងខាងកើត ។ រីឯការព្យួររូបថតក្រុមគ្រួសារ ដែលស៊ុមធ្វើពីឈើ ឬស៊ុមមានពណ៌ បៃតងខ្ចីទិសនេះក៏អាចជួយជំរុញជោគជតានៃសេចក្តីស្នេហា ។ លោកអ្នកក៏អាចប្រើប្រាស់ទិសនេះ ដើម្បីឱ្យជួយនូវលាភសំណាងផ្នែកលុយកាក់ដោយប្រើធាតុភ្លើង ដូចជាផ្កាពណ៌ក្រហម ឬរូបភាព ដែលមានពណ៌ក្រហមស្រស់ស្អាតមកបិទ ឬព្យួរនៅទិសនេះ ។

- **ទិសបស្ចិម** (លិច) "ធាតុមាស" ។ ប្រចាំទិសបស្ចិមក្នុងឆ្នាំថ្មីនេះមានធាតុដី ។ បើធាតុទាំងពីរនេះរួមបញ្ចូលគ្នា គឺល្អណាស់ ។ ដូច្នេះលោកអ្នកមិនត្រូវបណ្តោយឱ្យក្នុងបរិវេណផ្ទះនៅផ្នែកខាងលិចសុកមម៉ុកឡើយ ។ ប៉ុន្តែគួរបង្កើនជោគជតានៃភាពមានបានដោយយករូបភាព ឬវត្ថុប្រើប្រាស់ដែលមានពណ៌លឿងពណ៌ស្ករ ឬពណ៌ត្នោតមកតុបតែងលម្អ ឬជារូបចម្លាក់ស្អាតធ្វើអំពីថ្មកែវក៏បានដែរ ព្រោះសុទ្ធតែជាធាតុដី ។

- **ទិសឧត្តរ** (ជើង) "ធាតុទឹក" ។ ក្នុងឆ្នាំថ្មីនេះ ដោយសារតែធាតុរបស់តារាប្រចាំទិសនេះជាធាតុដី ដូច្នេះធាតុទាំងនេះមិនត្រូវគ្នាទេ ។ ត្រូវរកវត្ថុអ្វី ដែលតំណាងឱ្យធាតុសម្រាប់ភ្ជាប់ធាតុទាំងពីរនេះ មកដាក់តាំងលម្អក្នុងបរិវេណផ្ទះផ្នែកនៃទិសខាងជើង ។ អាចជ្រើសរើសយកធាតុមាស ឬជាថូដែលមានពណ៌មាស ឬពណ៌ប្រាក់ក៏បានដើម្បីឱ្យ ជួយទ្រទ្រង់នូវថាមពលនៃសេចក្តីសុខ ។ ឯកញ្ចក់៨ទិសក៏អាចជួយបញ្ចាំងផ្លាតនូវថាមពលមិនល្អឱ្យចេញឆ្ងាយទៅវិញ បានដែរ ។ ម្យ៉ាងទៀតអ្នកក៏គួរតាំងលម្អជារូបជ្រូក ដើម្បីជួយនាំមកនូវជោគល្អនៃភាពសម្បូរសប្បាយទោះជាពណ៌ប្រាក់ពណ៌មាសក៏បាន ។ ប្រសិនបើក្នុងផ្ទះរបស់អ្នកមានសមាជិកណាឈឺញឹកញាប់ត្រូវការឃ្លោកលោហៈមកដាក់តាំងនៅទិសខាងជើងនេះ ។

- **ទិសទក្សិណ** (ត្បូង) "ធាតុភ្លើង" ។ តារាសម្រាប់ទិសនេះជាធាតុទឹកដូច្នេះធាតុទាំងពីរនេះ ប្រឆាំងគ្នា ។ ក្នុងឆ្នាំថ្មីនេះអ្នកត្រូវយកចិត្តទុកដាក់រៀបចំក្នុងគេហដ្ឋាននៅទិសខាងត្បូងឱ្យបានល្អ ដើម្បីឱ្យជោគជតារាសីបានល្អប្រសើរដោយធាតុឈើសម្រាប់ទិសនេះ ។ គួរតែយកកម្រាលព្រំពណ៌បៃតងទៅក្រាលនៅមាត់ទ្វារ ឬបន្ទប់ដែលស្ថិតនៅទិសខាងត្បូងនៃតួផ្ទះ ។ ម្យ៉ាងទៀតអ្នកក៏អាចប្រើវិធីងាយៗ ដាំដើមឈើពណ៌បៃតង ដើម្បីបង្កើនជោគជតានៃភាពភ្លឺចិញ្ចាចចិញ្ចែងនៅក្នុងដំណើរជីវិត ។

-**ទិសឦសាន** (កើតឆៀងជើង) "ធាតុដី"។ តារាប្រចាំទិសឦសានសម្រាប់ឆ្នាំថ្មីនេះ គឺធាតុភ្លើង ។ ដូច្នេះធាតុដី និងធាតុភ្លើងរួមចូលគ្នាពិតជាល្អណាស់ ។ ឯពណ៌ដែលត្រូវនឹងធាតុទាំងពីរនេះ គឺពណ៌ក្រហមពណ៌ទឹកក្រូច ពណ៌ស្វាយ ពណ៌ស៊ីជម្ពូ ពណ៌លឿង និងពណ៌ត្នោត ។ ចំពោះវត្ថុ ដែលគួរប្រើនៅឆ្នាំថ្មីនេះ គឺកម្រាលព្រំមុខផ្ទះដើម្បីឱ្យជួយស្រូបនូវថាមពល "ឈើ"នៃជោគសំណាងនៅទិសនេះ ។ ម្យ៉ាងទៀតគួរតែយកភូគោលមកដាក់តាំងនៅក្នុងផ្ទះត្រង់ផ្នែកនៃទិសនេះក៏បានដើម្បីឱ្យជួយជំរុញនូវជោគជតាក្នុងកិច្ចការងារ និងមុខរបរជួញដូរផ្សេងៗឱ្យកាន់តែរីកចម្រើនព្រោះភូគោលជាតំណាងឱ្យធាតុដីហើយមានន័យសម្រាប់ចក្ខុវិស័យដ៏វែងឆ្ងាយផងដែរ ។

- **ទិសអាគ្នេយ៍** (កើតឆៀងខាងត្បូង) "ធាតុឈើ"។ បើក្នុងបរិវេណផ្ទះ ផ្នែកទិសនេះមើលទៅសុកមម៉ុកវានឹងនាំឱ្យកើតរឿងរ៉ាវក្តៅក្រហាយផ្សេងៗ។ ដូច្នេះ ត្រូវធ្វើការទប់ស្កាត់ និងរុញច្រានទៅវិញនូវថាមពលមិនល្អដោយប្រើវត្ថុចម្លាក់ជារូបពីរ៉ាមីតមានរាងបីជ្រុងជាតំណាងឱ្យធាតុភ្លើងរបស់តារាប្រចាំទិសអាគ្នេយ៍ក្នុងឆ្នាំនេះ ដែលពីរ៉ាមីតនោះគួរតែពណ៌ក្រហម ពណ៌ទឹកក្រូច ពណ៌ស៊ីជម្ពូ ឬពណ៌ស្វាយក៏បាន ។ ម្យ៉ាងទៀត លោកអ្នកក៏អាចប្រើគោមភ្លើងគ្រិស្តាល់នៅត្រង់ទិសនេះក៏បាន ដើម្បីឱ្យវាជួយកម្ចាត់កម្ចាយថាមពលមិនល្អនាំមកវិញនូវជោគជតារាសីសេចក្តីស្នេហានិងលុយកាក់ ។

-**ទិសពាយ័ព្យ** (លិចឆៀងជើង) "ធាតុមាស" ។ ចំពោះអ្នកដែលមានទ្វារផ្ទះបែរមុខទៅរកទិសនេះអាចទទួលនូវផលប៉ះពាល់ពីថាមពលមិនល្អច្រើនជាងគេ ។ ប៉ុន្តែអាចកែខៃបានដោយប្រើវត្ថុសម្រាប់ដាក់តាំងលម្អដែលមានរាងមូល រាងពងក្រពើ និងជាតំណាងនូវធាតុមាសដែល មានពណ៌ស ពណ៌ទង់ដែងពណ៌មាស ពណ៌ប្រាក់ ដូចជា នាឡិកា តាំងតុជាដើមគួរដាក់តាំងនៅទិសនេះ ។ រីឯវត្ថុប្រើប្រាស់សម្រាប់ហុងស៊ុយវិញ គឺកណ្តឹង ឬចង្រ្កង់សម្រាប់កម្ចាត់នូវថាមពលមិនល្អ ។

-**ទិសនិរតី** (លិចឆៀងត្បូង) "ធាតុដី" ។ ទិសនេះ មានទំនាក់ទំនងទៅនឹងសេចក្តីស្នេហាផងដែរ ។ ឆ្នាំថ្មីនេះអាចប៉ះពាល់ពាក្យសម្តីនឹងគ្នារវាងស្វាមីភរិយា ឬមានអ្នកទីបីចូលមកជ្រៀតជ្រែក បើពុំបានយកចិត្តទុកដាក់ចំពោះទិសនិរតីនេះ ឱ្យបានល្អទេនោះ ។ ដូច្នេះលោកអ្នកគួរតែដាក់តាំងលម្អរូបសត្វហង្សមួយគូធ្វើអំពីគ្រិស្តាល់ ដើម្បីឱ្យជួយការពារឃុំគ្រងសេចក្តីស្នេហារបស់លោកអ្នក ។ បើមិនអ៊ីចឹងទេ អាចរកកង្ហាស្អាតៗដាក់តាំងជំនួសក៏បាន ព្រោះវាអាចបក់ផាត់ នូវរឿងឧបទ្រព្យឱ្យចេញឆ្ងាយពីជីវិតគូស្នេហ៍បាន ។ ពិសេសគឺកញ្ចក់៨ទិស ដែលអាចជួយឃុំគ្រងជីវិតគូស្នេហ៍របស់លោកអ្នកបាន ៕

តមកទំព័រទី ១១

## មានអ្វីប្លែក ?

ដោយក្រុមនយោបាយអ្នកស្រី អ៊ុង សាន់ ស៊ូគី ជ័យលាភីណូបែលដែលបានទទួលកៅអីសភាចំនួន១៩ ក្នុងចំណោម៤៥ ដែលដាក់ឱ្យបោះឆ្នោតលក្នុងប្រទេសកាលពីថ្ងៃ១មេសានេះ ។ នេះជាលើកទីមួយហើយដែលបន្ទាប់ពីអ្នកស្រី ស៊ូគី ចេញពីការជាប់ឃុំនៅផ្ទះឆ្នាំ២០១០(ជាប់ឃុំ២០ឆ្នាំ) ដែលសម្លេងនយោបាយក្រុមអ្នកស្រីបានលាន់ឮជាផ្លូវការឡើងវិញ ។

ប្រទេសភូមាដឹកនាំដោយក្រុមនយោផ្តាច់ការនិយមបានត្រូវសហគមន៍អន្តរជាតិដាក់ទណ្ឌកម្មបិទទំនាក់ទំនងជាមួយពិភពលោកច្រើនឆ្នាំ បើទោះជាមានការគាំទ្រផ្ទៃក្នុងពីចិនកុម្មុយនីយក៏ដោយក្តី។ អន្ត-រាគមន៍របស់សហរដ្ឋអាមេរិកតំណាងដោយអ្នកស្រីហ៊ីឡារីគ្លីនតុន និង អ.ស.ហបានធ្វើឱ្យអំណាចផ្តាច់ការភូមាលាកណ្តាប់ដៃដែករៀបជាដំណាក់ការ៧រយៈ ដើម្បីផ្លាស់ប្តូរសមាជិកសភាភូមា NDL ចំនួន១៩នាក់ថ្មីពីក្រុមអ្នកស្រី ស៊ូគី គឺជាដំណាក់ការទី១នៃដំណើរសន្យាថា ទៅរកលទ្ធិប្រជាធិបតេយ្យជាផ្លូវនៃការលើកទណ្ឌកម្មពិភពលោកនោះចេញ ៕

តមកទំព័រទី ៩

## បទសម្ភាសន៍ជាមួយ Kathy Egmont...

មួយទៀតដែរ អ្វីៗសុទ្ធតែថ្មីសម្រាប់ពួកគាត់ ដូច្នេះត្រូវតែរៀនតែកូនសិស្សខ្មែរ មិនសូវមានសម្លេងទេ នៅស្ងៀមស្ងាត់មិនចង់ក្រោកឈរនិយាយអ្វីប្រាប់ដល់ក្រុមមនុស្សណាទេ មិនចង់ឱ្យនរណាមកចាប់អារម្មណ៍ពីខ្លួន... នេះគឺជាការកត់សម្គាល់របស់ខ្ញុំចំពោះក្មេងរបស់យើង ដែលខ្ញុំសាកល្បងប្តូរអាកប្បកិរិយានោះចេញ ឱ្យអាចនិយាយចេញមកដោយងាយស្រួល អាចឱ្យទៅជាអ្នកដឹកនាំម្នាក់បាន ។

**ខ្មែរផុស :** ចុះឪពុកម្តាយវិញយ៉ាងណាដែរ ?

**ខាធី :** នៅស្ងប់ស្ងៀមដូចគ្នា

**ដេប៉ូរ៉ា :** ចូលចិត្តថយខ្លួន មិនចង់បង្ហាញខ្លួន ឬនិយាយអ្វីទេ!

**ខាធី :** សាលាយើង គឺបង្រៀនសិស្សឱ្យចេះកំណត់គោលដៅរបស់ខ្លួន -ត្រូវទៅឱ្យដល់មហាវិទ្យាល័យ -រៀនអង់គ្លេស -រៀនគ្រប់ព័ត៌មានទាំងអស់ -រៀនឱ្យបានល្អ ពុំមែនមានជីវិត ហើយដើរតាមតែជីវិតផ្តល់វាសនាមកយើងនោះទេ ផ្លូវពីរនេះមិនដូចគ្នាទេ ។ ពេលខ្លះយើងជម្រុញសិស្សខ្លាំងឱ្យរៀនក្រោយម៉ោង ឬរៀនថ្ងៃសៅរ៍ ដែលឪពុកម្តាយខ្លះឃើញកូនរៀនច្រើនពេកមិនសប្បាយចិត្ត នៅសហរដ្ឋអាមេរិកនេះ អ្វីដែលគេត្រូវការ គឺមនុស្សមានការសិក្សា -មានសញ្ញាប័ត្រខ្ពស់ ទើបមានកិរិតជីវភាពសមរម្យ តែបើទៅមិនទាន់បានទេ ភារកិច្ចយើងគឺបង្ហាត់ឱ្យសិស្សមានជម្រើសថា ខ្លួនមានសត្ថភាពអាចទៅមុខដល់មហាវិទ្យាល័យបាន ។

**ខ្មែរផុស :** ការរៀនសូត្រជាច្រើន គឺធ្វើនៅផ្ទះ តើអ្នកជួបឪពុកម្តាយប៉ុន្មានដងក្នុងមួយឆ្នាំ?

**ខាធី :** ៣ដងក្នុង១ឆ្នាំ យើងអញ្ជើញម្តាយឪពុកមកប្រជុំផ្ទាល់ខ្លួន ១-នៅ១ថ្ងៃមុនចូលរៀន ២-ថ្ងៃដែលទទួល Report Card ៣-នៅចុងឆ្នាំសិក្សា ឪពុកម្តាយមកស្ទើរតែទាំងអស់យើងរាយការណ៍អំពីដំណើរការសិក្សានៅសាលារបស់កូនគាត់ ។យើងមានប្រជុំ៦ដងទៀត ក្នុងមួយឆ្នាំដែលឪពុកម្តាយសិក្សា ដូចជាវិទ្យាទុកចិត្តក្នុងការរៀនសូត្ររបស់កូន -ត្រៀមខ្លួនធ្វើ Test ឬក៏សម្ពោធសាលាធ្វើ BBQ មានឪពុកម្តាយមកច្រើន -ឪពុកម្តាយខ្មែរគាំទ្រសកម្មភាពយើងដោយយើងមានអ្នកជួយបកប្រែភាសាខ្មែរ ងាយ ស្រួលយល់គ្នា ។ ខ្ញុំដឹងថាឪពុកម្តាយនឹងសិស្ស ខ្មែរ នៅមានបញ្ហាច្រើនដើម្បីការសិក្សារបស់ កូន តែសាលាយើងក៏ខំប្រឹងធ្វើឱ្យមានកេរ្តិ៍ឈ្មោះជាសាលាឆាទ័រស្គូលដ៏ល្បីជាងគេនៅឡូវែលនេះដែរ តែធ្វើពុំទាន់បាននៅឡើយ ៕

**ខ្មែរផុស : សូមអរគុណ !**

